# គំរូវិញ្ញាសាសរសេរតាមអានថ្នាក់ទី៣

---

**វិញ្ញាសាទី១**

(ពិន្ទុសរុប: ១០ពិន្ទុ  រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យស្រៈ ព្យញ្ជនៈ និងពាក្យខាងក្រោម។

ា ើ ី ុ ៀ

ឮ ឧ ឱ ឰ ឪ

ឃ ឈ ឆ ច ញ

កី ខោ តឿ ថូ ផៃ

គោ ឃុំ ជឿ ធា ឈើ

---

**វិញ្ញាសាទី២**

(ពិន្ទុសរុប : ១០ពិន្ទុ  រយៈពេល : ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**សាលាកុមារមេត្រី** (១០ពិន្ទុ)

សាលារៀនខ្ញុំជាសាលាកុមារមេត្រី។ សាលារៀននេះសង់លើទីទួលខ្ពស់ មានបរិវេណធំទូលាយ និងមានរបងហ៊ុំព័ទ្ធជុំវិញ។ នៅក្នុងទីធ្លា មានអគារបីខ្នងស្មើនឹងដប់ប្រាំបីបន្ទប់ និងមានដងទង់ជាតិ សួនច្បារ ទីលានកីឡា និងដើមឈើធំៗ។ នៅក្រោយអគារមានសួនជីវៈចម្រុះ សួនបន្លែ និងបង្គន់អនាម័យ។ នៅក្នុងបន្ទប់រៀននីមួយៗ មានតុ កៅអី និងក្ដារខៀន។ នៅតាមជញ្ជាំងមានពាក្យស្លោក និងស្នាដៃសិស្សជាច្រើនទៀត។ សាលារៀននេះមានពណ៌បៃតងស្រស់បំព្រងជានិច្ច។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : បរិវេណ បំព្រង។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ទ្បើង ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ល្អ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ព័ទ្ធ។

**ខ.២- សំណួរ**

១- តើសាលារៀននេះជាសាលាអ្វី?

២- តើសាលារៀននេះមានប៉ុន្មានបន្ទប់?

៣- តើនៅក្នុងបន្ទប់រៀនមានសម្ភារៈអ្វីខ្លះ?

៤- តើប្អូនចូលចិត្តរៀននៅសាលានេះ ឬទេ? ហេតុអ្វី?

---

## **កំណែលំហាត់ទី២**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- បរិវេណ : ទីជិតខាងដែលព័ទ្ធជុំវិញ។
- បំព្រង : ស្រស់ត្រចង់ ឬត្រយង់ភ្លឺថ្លា។

*ខ.១.២- បដិសព្ទ(ពាក្យផ្ទុយ) ៖*

- ឡើង ≠ ចុះ
- ល្អ ≠ អាក្រក់។

*ខ.១.៣- វេវចនសព្ទ(សទិសន័យ)នឹងពាក្យ ៖* សិក្សា : រៀន រៀនសូត្រ។

*ខ.១.៤- សទិសសព្ទ(សទិសសូរ)នឹងពាក្យ ៖*

- ព័ទ្ធ : ចង ចងវណ្ឌជុំវិញ រុំជុំវិញ។
- ព័ត : បក់ (ព័តថ្វាយ គឺបក់ថ្វាយ)។

**ខ.២- ចម្លើយ**

១- សាលារៀននេះជាសាលាកុមារមេត្រី។
២- សាលារៀននេះមានដប់ប្រាំបីបន្ទប់។
៣- នៅក្នុងបន្ទប់រៀនមានសម្ភារៈផ្សេងៗដូចជាតុ កៅអី ក្ដារខៀន។
៤- ខ្ញុំចូលចិត្តរៀននៅសាលានេះណាស់ ពីព្រោះនៅទីនេះមានខ្យល់អាកាសបរិសុទ្ធ បរិស្ថានស្អាត និងមានគ្រូបង្រៀនល្អៗជាច្រើន។

---

## **លំហាត់ទី៣**

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

### **សិស្សឧស្សាហ៍**

សុភាពជាសិស្សឧស្សាហ៍។ រាល់ថ្ងៃនាងទៅរៀនទៀងទាត់ និងទាន់ពេលវេលាជានិច្ច។ សុភាពគោរពបទបញ្ជារបស់សាលាបានត្រឹមត្រូវ។ ក្នុងថ្នាក់រៀននាងយកចិត្តទុកដាក់ស្ដាប់គ្រូពន្យល់ និងហ៊ានជម្រាបសួរគ្រូនៅពេលមិនយល់។ នៅពេលខ្លះនាងជួយបង្រៀនមិត្តរួមថ្នាក់ដែលរៀនយឺតទៀតផង។ សុភាពតែងតែណែនាំមិត្តភក្ដិកុំឱ្យដើរលេងផ្ដេសផ្ដាស។ នៅផ្ទះសុភាពខិតខំធ្វើលំហាត់ អានសៀវភៅ សិក្សាស្រាវជ្រាវ និងជួយធ្វើកិច្ចការផ្ទះ។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : គោរព ផ្ដេសផ្ដាស។

---

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ឧស្សាហ៍។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ដើរ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : សួរ។

**ខ.២- សំណួរ**

១- តើសុភាពជាសិស្សដូចម្ដេច?

២- តើសុភាពណែនាំមិត្តភក្ដិដូចម្ដេច?

៣- តើនៅផ្ទះសុភាពធ្វើអ្វីខ្លះ?

៤- តើប្អូនៗត្រូវធ្វើដូចម្ដេចខ្លះដើម្បីក្លាយខ្លួនជាសិស្សឧស្សាហ៍?

## កំណែវិញ្ញាសាទី៣

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- គោរព: សេចក្ដីឱនលំទោន។
- ផ្ដេសផ្ដាស: ដែលខ្ចីខ្ចា ឥតសណ្ដាប់ធ្នាប់។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* ឧស្សាហ៍ ≠ ខ្ជិល។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* ដើរ: យាត្រា ចរ និមន្ត យាង។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- សួរ : ពោលពាក្យឆ្ពោះទៅរកអ្នកដទៃឱ្យគេឆ្លើយតប។
- សួគ៌ : ឋានទេវតា។
- ស្ទួ : ដើរលើស្នួ ឬលើអ្វីៗដែលមានគ្រឿងតោងផង។

**ខ.២- ចម្លើយ**

១- សុភាពជាសិស្សឧស្សាហ៍។

២- សុភាពណែនាំមិត្តភក្ដិកុំឱ្យដើរលេងផ្ដេសផ្ដាស។

៣- នៅផ្ទះសុភាពខិតខំធ្វើលំហាត់ អានសៀវភៅ សិក្សាស្រាវជ្រាវ និងជួយធ្វើកិច្ចការផ្ទះ។

៤- ដើម្បីក្លាយខ្លួនទៅជាសិស្សឧស្សាហ៍យើងត្រូវខិតខំរៀនសូត្រ ស្ដាប់ការណែនាំរបស់គ្រូ មិនដើរលេងផ្ដេសផ្ដាស មិនទុកពេលវេលាឱ្យកន្លងផុត។

---

## វិញ្ញាសាទី៤

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

---

## ការសម្អាតថ្នាក់រៀន

សិស្សានុសិស្សទាំងអស់មានភារកិច្ច ជាអ្នកបោសសម្អាតថ្នាក់រៀន។ នៅក្នុងថ្នាក់រៀន ត្រូវចែកសិស្សជាក្រុម និងផ្លាស់ប្តូរវេនគ្នាសម្អាតបន្ទប់រៀងរាល់ថ្ងៃ។ ព្រឹកថ្ងៃព្រហស្បតិ៍ដល់វេនក្រុមរបស់វណ្ណាសម្អាតបន្ទប់រៀន។ មិត្តភក្តិដែលជាសមាជិកក្រុមទាំងអស់នាំគ្នាទៅសាលារៀនឱ្យបានមុនម៉ោងសិក្សាដោយយកអំបោស កន្ទប ធុងទឹក បង្គី ប្រដាប់ចូកទៅជាមួយផង។ ក្រុមវណ្ណានាំគ្នាបោសបន្ទប់ ជូតតុ កៅអី ទ្វារ និងបង្អួច។ អ្នកខ្លះប្រមូលសំរាម កម្ទេចកម្ទី កើបធូលីយកទៅបោះចោលក្នុងធុងសំរាម ថ្នាក់រៀនស្អាតជានិច្ច។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : កម្ទេច បង្គី។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ចូល ត្រូវ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : មិត្តភក្តិ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : មាន។

**ខ.២- សំណួរ**

១- តើភារកិច្ចរបស់សិស្សានុសិស្សធ្វើអ្វី?

២- តើក្រុមរបស់វណ្ណាសម្អាតបន្ទប់រៀននៅថ្ងៃណា?

៣- តើមានសម្ភារៈអ្វីខ្លះដែលត្រូវយកទៅសម្អាតបន្ទប់រៀន?

៤- តើថ្នាក់រៀនស្អាតបានផ្តល់គុណតម្លៃអ្វីខ្លះដល់ប្អូន?

## កំណែវិញ្ញាសាទី៤

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- កម្ទេច: ធ្វើឱ្យខ្ទេច។
- បង្គី : ប្រដាប់ប្រើការរែកដី។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖*

- ចូល ≠ ចេញ
- ត្រូវ ≠ ខុស។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* មិត្តភក្តិ : សម្លាញ់ គូកន ភ្លើ ពួកម៉ាក ភឿន។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ៖*

- មាន : បរិបូរដោយ។
- មៀន : ចង្កំរែងស្រោបគល់ដងកាំបិត។
- មៀន : ឈ្មោះឈើមួយប្រភេទជាដំណាំស្រុកផ្លែមូលៗទំហំខ្នាតមេដៃ វលាទុំមានក្លិនសាច់ក្រអូប មានរសជាតិផ្អែម ប្រើជាបង្អែម។

**ខ.២- ចម្លើយ**

១- ភារកិច្ចរបស់សិស្សានុសិស្សជាអ្នកបោសសម្អាតថ្នាក់រៀន។

២- ក្រុមរបស់វណ្ណាសម្អាតបន្ទប់រៀននៅព្រឹកថ្ងៃព្រហស្បតិ៍។

៣- សម្ភារៈដែលត្រូវយកទៅសម្អាតបន្ទប់រៀនមានអំបោស កន្ទប ធុងទឹក បង្គី ប្រដាប់ចូកសំរាម។

៤- ថ្នាក់រៀនស្អាតបានផ្តល់គុណតម្លៃដូចជាមានអារម្មណ៍ល្អចង់រៀនមិនធុញទ្រាន់ ស្រឡាញ់ថ្នាក់រៀន ខ្យល់អាកាសបរិសុទ្ធធ្វើឱ្យមានសុខភាពល្អ។

---

## **វិញ្ញាសាទី៥**

(ពិន្ទុសរុប: ១០ពិន្ទុ   រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ពេលគោរពទង់ជាតិ**

យើងបុត្រខេមរា          មុនចូលសិក្សា          គោរពទង់ជាតិ
ឈរតម្រង់ជួរ          រួតរះខ្មីឃ្មាត          កុំគេចកុំឆ្វៀត
មកទាន់វេលា។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : គេច រួតរះ។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ចូល ឈរ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : បុត្រ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : មុន។

**ខ.២- សំណួរ**

១- តើមុនចូលសិក្សាកូនៗត្រូវធ្វើអ្វី?

២- តើនៅពេលគោរពទង់ជាតិកូនឈរដូចម្តេច?

៣- តើកូនត្រូវធ្វើដូចម្តេចខ្លះដើម្បីទៅសាលារៀនឱ្យបានទាន់ពេលវេលា?

៤- ហេតុអ្វីបានជាកូនត្រូវគោរពទង់ជាតិ?

## **កំណែវិញ្ញាសាទី៥**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- គេច : ចៀសវាង។
- រួតរះ: រវៀសរវៃ  ម៉ឺងម៉ាត់។

---

*ខ.១.២- បដិសព្ទ(ពាក្យផ្ទុយ) ៖*

- ចូល ≠ ចេញ
- ឈរ ≠ អង្គុយ។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* បុត្រ : កូន ព្រះរាជបុត្រ។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- មុន : ស្ថិតនៅជាដំបូងឬដើមគេ។
- មុន : ឈ្មោះរោគកើតនៅត្រង់មុខមនុស្សដោរចេញជាកន្ទួលមានគ្រាប់។
- មន្ត : ពាក្យដែលចងក្រងជារបៀបសម្រាប់សូត្រសែកស្តោះផ្លុំ។

**ខ.២- ចម្លើយ**

១- មុនចូលសិក្សាខ្ញុំត្រូវគោរពទង់ជាតិ។

២- នៅពេលគោរពទង់ជាតិខ្ញុំត្រូវឈរតម្រង់ជួរ។

៣- ដើម្បីទៅសាលារៀនឱ្យបានទាន់ពេលវេលាយើងត្រូវរូតរះ ខ្មីឃ្មាត កុំគេចវេះ។

៤- បានជាខ្ញុំត្រូវគោរពទង់ជាតិពីព្រោះទង់ជាតិជាព្រលឹងរបស់ជាតិ ជាអត្តសញ្ញាណជាតិ។

---

**ចញ្ញាសាទី៦**

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**រឿងទឹកចិត្តដ៏ប្រពៃ**

ថ្ងៃមួយស្រីនាងបានត្រឡប់មកពីសាលារៀនមុនម៉ោង។ មីងណោងឆ្ងល់ក៏សួរ៖ «យី! ថ្ងៃនេះម្តេចក៏កូនចេញពីរៀនមុនម៉ោងដូច្នេះ?»។ ស្រីនាងឆ្លើយ៖ «ចាសម៉ែ! ថ្ងៃនេះអ្នកគ្រូឈឺ»។ ស្រីនាងបានសុំម្តាយឱ្យជូននាងទៅសួរសុខទុក្ខអ្នកគ្រូ ដែលកំពុងសម្រាកព្យាបាលនៅឯមណ្ឌលសុខភាព។ មីងណោងឆ្លើយ៖ «អើ! ល្អហើយកូន ម៉ែជូនកូនទៅ តែចាំម៉ែរៀបចំផ្លែឈើ បន្តិចបន្តួចផ្ញើជូនគាត់»។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ព្យាបាល ផ្ញើ។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : សុខ ឈឺ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ជូន។

៤- សទិសសព្ទ(សទិសសូរ)នឹងពាក្យ : រៀប។

**ខ.២- សំណួរ**

១- តើស្រីនាងត្រឡប់មកពីណា?

២- តើម៉ែស្រីនាងសួរដូចម្តេច?

---

៣- តើស្រីនាងឆ្លើយដូចម្ដេច?

៤- ហេតុអ្វីបានជាប្អូនទៅសួរសុខទុក្ខពេលគ្រូឈឺ?

**កំណែវិញ្ញាសាទី៦**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ព្យាបាល : ការថែរក្សា បីបាច់។
- ផ្ញើ : បញ្ជូនបញ្ញើពីទីមួយទៅកាន់ទីមួយទៀត។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖*

- សុខ ≠ ទុក្ខ
- ឈឺ ≠ ជា។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* ជូន: ឱ្យ ប្រគេន ថ្វាយ ផ្ដល់ ប្រទាន។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- រៀប : ធ្វើឱ្យមានរបៀប។
- រៀប : ទៀប ហៀប ជិត រកកល់។
- រាប : ដែលមិនរដិបរដុប ដែលឥតប៉ោង ឥតផត។
- រាប : ដែលសុភាពទន់ភ្លន់។

**ខ.២- ចម្លើយ**

១- ស្រីនាងត្រឡប់មកពីសាលារៀនមុនម៉ោង។

២- ម៉ែស្រីនាងសួរថា ថ្ងៃនេះម្ដេចក៏កូនចេញពីរៀនមុនម៉ោងដូច្នេះ?

៣- ស្រីនាងឆ្លើយថាអ្នកគ្រូឈឺ។

៤- បានជាខ្ញុំទៅសួរសុខទុក្ខពេលគ្រូឈឺ ពីព្រោះខ្ញុំចង់ធ្វើជាគំរូល្អសម្រាប់ប្អូនៗជំនាន់ក្រោយលើកកម្លាំងចិត្តគាត់ ដើម្បីជាការតបស្នងសងគុណ។

---

**វិញ្ញាសាទី៧**

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**សិស្សគំរូ**

សុធាជាសិស្សរៀនពូកែ ហើយគោរពវិន័យជានិច្ច។ ស្ទើរតែគ្រប់ពេលគេខំប្រឹងប្រែងរៀនសូត្រ។ គេតែងស្ដាប់ដំបូន្មាន និងចេះគោរពចាស់ទុំ។ នៅពេលទំនេរសុធាជួយធ្វើកិច្ចការឪពុកម្ដាយនៅផ្ទះ។ អ្នកភូមិកោតសរសើរសុធាគ្រប់ៗគ្នា។

---

ខ- **សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : វិន័យ កោត។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : សរសើរ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ម្ដាយ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : កោត។

**ខ.២- សំណួរ**

១- តើសុធាជាសិស្សរៀនដូចម្ដេច?

២- តើពេលទំនេរសុធាចូលចិត្តធ្វើអ្វី?

៣- តើសុធាស្ដាប់ដំបូន្មាន និងគោរពអ្នកណា?

៤- ហេតុអ្វីបានជាប្អូនត្រូវគោរពវិន័យ?

## កំណែបញ្ញាសាទី៧

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- វិន័យ : ការដឹកនាំទៅរកផ្លូវល្អ ច្បាប់ប្រដៅឱ្យប្រព្រឹត្តត្រឹមត្រូវ។
- កោត : ស្ញែង ស្ញើច។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* សរសើរ ≠ ស្ដីបន្ទោស។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* ម្ដាយ : មាតា ញោមស្រី ម៉ែ ម៉ាក់។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- កោត : ស្ញែង ស្ញើច។
- កោដិ : ចំនួនដប់លាន។
- កោដ្ឋ : របស់សម្រាប់ដាក់សព ដាក់ធាតុ។

**ខ.២- ចម្លើយ**

១- សុធាជាសិស្សរៀនពូកែ និងគោរពវិន័យ។

២- ពេលទំនេរសុធាចូលចិត្តជួយធ្វើកិច្ចការឪពុកម្ដាយនៅផ្ទះ។

៣- សុធាស្ដាប់ដំបូន្មាន និងគោរពចាស់ទុំ។

៤- បានជាខ្ញុំត្រូវគោរពវិន័យព្រោះវាជាទម្លាប់មួយល្អសម្រាប់យើង មានស្មារតីប្រុងប្រយ័ត្ន ធ្វើឱ្យយើងមានជំនឿជាក់លើខ្លួនឯង។

---

## **វប្បធម៌ទី៨** 

(ពិន្ទុសរុប: ១០ពិន្ទុ  រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**សមាជិកគ្រួសារ**

គ្រួសារដារីមានសមាជិកច្រើននាក់ ហើយម្នាក់ៗមានភារកិច្ចរៀងៗខ្លួន។ ជីដូនជីតានៅផ្ទះថែទាំចៅ។ ឪពុកម្ដាយប្រកបរបររកស៊ី ដើម្បីផ្គត់ផ្គង់ជីវភាពគ្រួសារ។ ចំណែកកូនប្រុស ស្រីមានភារកិច្ចខិតខំរៀនសូត្រ ដើម្បីឱ្យមានអនាគតល្អ។ សមាជិកនៅក្នុងគ្រួសារនេះមានការគោរពស្រឡាញ់គ្នា យោគយល់គ្នា និងចេះជួយទុក្ខធុរៈគ្នាទៅវិញទៅមក។ រាល់ល្ងាចគ្រួសារដារីតែងតែជជែកគ្នាលេងយ៉ាងសប្បាយរីករាយ និងមានភាពស្និទ្ធស្នាលក្រៃលែង។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ធុរៈ ភារកិច្ច។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ស្រឡាញ់ សប្បាយរីករាយ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ជីដូន។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ស្និទ្ធ។

**ខ.២- សំណួរ**

១- តើគ្រួសារដារីមានសមាជិកប៉ុន្មាននាក់?

២- តើកូនប្រុសស្រីមានភារកិច្ចធ្វើអ្វី?

៣- តើរៀងរាល់ល្ងាចគ្រួសារដារីតែងតែធ្វើអ្វី?

៤- តើប្អូនៗត្រូវធ្វើដូចម្ដេចខ្លះដើម្បីឱ្យគ្រួសារមានសុភមង្គល?

**កំណែវប្បធម៌ទី៨**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ធុរៈ :  រវល់ ដំណើរជំពាក់ដោយកិច្ចការ។
- ភារកិច្ច :  ការទទួលបន្ទុកការងារ។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖*

- ស្រឡាញ់ ≠  ស្អប់
- សប្បាយរីករាយ  ≠  ទុក្ខព្រួយ។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* ជីដូន : ដូន យាយ អយ្យិកា។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- ស្និទ្ធ: ដែលជាទីស្រឡាញ់ ជាទីពេញចិត្ត។
- ស្និត: ប្រជុំ ឬសំណុំផ្លែចេកដែលនៅជាប់នឹងស្ទង។

**ខ.២- ចម្លើយ**

១- គ្រួសារដារីមានសមាជិកច្រើននាក់។

២- កូនប្រុសស្រីមានភារកិច្ចខិតខំរៀនសូត្រដើម្បីឱ្យមានអនាគតល្អ។

៣- រៀងរាល់ល្ងាចគ្រួសារដារីតែងតែជជែកគ្នាលេងយ៉ាងសប្បាយរីករាយ និងមានភាពស្និទ្ធស្នាលក្រៃលែង។

៤- ដើម្បីឱ្យគ្រួសារមានសុភមង្គលខ្ញុំត្រូវខិតខំរៀនសូត្រ មិនត្រូវដើរលេងផ្ដេសផ្ដាស់ ស្ដាប់ដំបូន្មានម្ដាយឪពុកនិងមិនប្រើអំពើហិង្សាក្នុងគ្រួសារ។

---

## **វិញ្ញាសាទី៩**

(ពិន្ទុសរុប: ១០ពិន្ទុ  រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**គុណម្ដាយឪពុក**

ពុកម៉ែខ្ញុំខិតខំធ្វើការ ទាំងទ្វេហារពុំដែលត្អូញត្អែរ
ការងាររាជការចម្ការស្រែ ធ្វើហូរហែពុំខ្លាចនឿយហត់។
ខ្ញុំស្រឡាញ់គោរពលោកណាស់ ព្រោះលោកចាស់ពូកែទ្រាំអត់
គុណធំធេងគ្មានដែនកំណត់ ទោះសមុទ្រក៏ប្រៀបពុំបាន។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ទ្វេហារ ត្អូញត្អែរ។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ធំធេង ពូកែ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ពុក។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ប្រៀប។

**ខ.២- សំណួរ**

១- តើអ្នកណាជាអ្នកមានគុណ?

២- តើឪពុកម្ដាយប្អូនធ្វើការងារដូចម្ដេច?

៣- តើប្អូនៗគោរពស្រឡាញ់ឪពុកម្ដាយដែរ ឬទេ?ព្រោះអ្វី?

៤- តើប្អូនៗត្រូវធ្វើដូចម្ដេចខ្លះចំពោះឪពុកម្ដាយ?

---

**កំណែលំហាត់ទី៩**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ទ្វេហារ  : អ្នកដែលនាំ ដែលបញ្ជូនរបស់អ្វីៗទៅទាំងពីរនាក់ជាមួយគ្នា។
- ត្អូញត្អែរ : ត្អូញហើយត្អូញទៀតចែប៉ប្រែ។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖*

- ធំធេង  ≠ តូចចង្អៀត
- ពូកែ    ≠  ខ្សោយ។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* ពុក :  ឪ   បិតា  ប៉ា។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- ប្រៀប : ធៀប ប្រដូច។
- ព្រៀប : ដែលពេញកំពុងរកកល់ហៀរ។
- ព្រាប : ឈ្មោះបក្សីមួយប្រភេទរូបរាងស្រដៀងនឹងលលក តែសម្បុរផ្សេងគ្នាមានច្រើនបែប។

**ខ.២- ចម្លើយ**

១- ពុកម៉ែជាអ្នកមានគុណ។

២- ឪពុកម្ដាយខ្ញុំធ្វើការងារពុំដែលត្អូញត្អែរ ពុំខ្លាចនឿយហត់។

៣- ខ្ញុំគោរពស្រឡាញ់ឪពុកម្ដាយខ្ញុំណាស់ ព្រោះគាត់ជាអ្នកអត់ទ្រាំនឹងការងារ។

៤- ខ្ញុំត្រូវគោរពស្រឡាញ់គាត់ ខិតខំរៀនសូត្រ ជួយធ្វើការងារផ្ទះខ្លះៗ មិនធ្វើឱ្យគាត់ពិបាកចិត្ត។

---

**លំហាត់ទី១០**

(ពិន្ទុសរុប: ១០ពិន្ទុ   រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**គោក្របីគ្មានធ្មេញលើ**

កាលពីព្រេងនាយមានខ្លាមួយសួរទៅគោថា ខ្លួនបងគោឯងធំ ហេតុអ្វីក៏ទ្រាំឱ្យមនុស្សទឹមដូច្នេះ? គោតបៈ "មនុស្សតូចមែន ប៉ុន្តែមានប្រាជ្ញា"។ ខ្លាឆ្ងល់ក៏សួរកសិករៈ "ពូ! ឯណាប្រាជ្ញារបស់ពូ?"។ កសិករតបៈ "ប្រាជ្ញាពូទុកនៅឯផ្ទះ ចាំពូទៅយកឱ្យមើល តែពូសុំចងឯងសិន ព្រោះខ្លាចស៊ីគោខ្ញុំ"។ ខ្លាក៏យល់ព្រម។ កសិករទាញដំបងសំពងក្បាលខ្លា រួចប្រាប់ថា នេះហើយប្រាជ្ញាមនុស្ស! ។ គោ និងក្របីឃើញដូច្នេះក៏សើច ហើយដួលបាក់ធ្មេញលើអស់រលីង។ ហេតុនេះហើយទើបគោ និងក្របីគ្មានធ្មេញលើរហូតដល់សព្វថ្ងៃនេះ។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

---

១- ចូរពន្យល់ពាក្យ : ប្រាជ្ញា សំពង។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : សើច យល់ព្រម។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ស៊ី។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : សព្វ។

**ខ.២- សំណួរ**

១- តើគោឆ្លើយតបទៅខ្លាដូចម្ដេច?

២- តើខ្លាសួរកសិករដូចម្ដេច?

៣- តើកសិករសំពងខ្លានឹងអ្វី?

៤- តើប្អូនត្រូវដោះស្រាយដូចម្ដេច នៅពេលជួបនឹងបញ្ហាអ្វីមួយកើតឡើង?

**កំណែចណ្ណាសាទី១០**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ប្រាជ្ញា : ការយល់ជាក់ច្បាស់។
- សំពង : វាយពេញកម្លាំងដៃដោយដំបង ឬកំណាត់ឈើជាដើម។

*ខ.១.២- បដិសព្ទ(ពាក្យផ្ទុយ) ៖*

- សើច ≠ យំ
- យល់ព្រម ≠ ជំទាស់។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖*

- ន : ស។
- ស៊ី: ហូប បរិភោគ ទទួលទាន ពិសា ឆាន់ សោយ។

*ខ.១.៤- សទិសសព្ទ (សទិសសូរ)នឹងពាក្យ ៖*

- សព្វ : ទាំងពួង ទាំងអស់។
- សព : រូបបុគ្គលស្លាប់។
- សប់ : ស្រូបដោយស្នប់ ។

**ខ.២- ខ្លឹមសារអត្ថបទ**

១- គោឆ្លើយតបទៅខ្លាថា មនុស្សតូចមែន ប៉ុន្តែមានប្រាជ្ញា។

២- ខ្លាសួរកសិករថា ពូ! ឯណាប្រាជ្ញារបស់ពូ?

៣- កសិករសំពងខ្លានឹងដំបង។

៤- នៅពេលជួបនឹងបញ្ហាអ្វីមួយកើតឡើងខ្ញុំត្រូវដោះស្រាយដោយប្រើប្រាជ្ញាជាអាវុធ។

## **ខញ្ញាសាទី១១**

(ពិន្ទុសរុប: ១០ពិន្ទុ  រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

### **អ្នកមានគុណ**

យើងជាកុលបុត្រកុលធីតាខ្មែរ ត្រូវមានចិត្តកតញ្ញូចំពោះអ្នកមានគុណ។ អ្នកមានគុណដូចជា ឪពុកម្ដាយ អាណាព្យាបាលជាដើម។ គាត់បានចិញ្ចឹមបីបាច់យើងតាំងពីវ័យកុមារ រហូតដល់វ័យសិក្សាទទួលបាននូវចំណេះដឹងខ្ពស់ មានសេចក្ដីថ្លៃថ្នូរ និងមានអនាគតល្អ។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : កតញ្ញូ ថ្លៃថ្នូរ។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ថ្លៃថ្នូរ ខ្ពស់។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : បីបាច់។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : គុណ។

**ខ.២- សំណួរ**

១- តើកូនត្រូវមានទឹកចិត្តកតញ្ញូចំពោះអ្នកណា?

២- តើអ្នកណាខ្លះជាអ្នកមានគុណរបស់កូន?

៣- តើអ្នកមានគុណបានធ្វើអ្វីចំពោះកូន?

៤- តើកូនត្រូវមានចិត្តកតញ្ញូចំពោះអ្នកមានគុណដូចម្ដេចខ្លះ?

### **កំណែខញ្ញាសាទី១១**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- កតញ្ញូ : អ្នកដឹងឧបការគុណដែលអ្នកឯទៀតគេបានធ្វើហើយដល់ខ្លួន គឺអ្នកដែលមិនភ្លេចមិនរមិលគុណគេ។
- ថ្លៃថ្នូរ : មានតម្លៃគួរលើកសរសើរ គួររាប់អាន។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖*

- ថ្លៃថ្នូរ ≠ ថោកទាប
- ខ្ពស់ ≠ ទាប។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* បីបាច់ : ថែ រក្សា ថែរក្សា។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- គុណ : សភាវធម៌ដែលចម្រើនឡើងដោយលក្ខណៈរបស់ខ្លួនគួរគោរពតបស្នងនឹងខានពុំបាន។

- គុន : ឈ្មោះសិល្បៈខាងគ្រឿងអាវុធសម្រាប់ចូលប្រឡូកលោតហក់ តយុទ្ធផ្ទាល់ខ្លួន។

**ខ.២- ចម្លើយ**

១- ខ្ញុំត្រូវមានទឹកចិត្តកតញ្ញូចំពោះអ្នកមានគុណ។

២- ឪពុក ម្ដាយ អាណាព្យាបាលជាអ្នកមានគុណរបស់ខ្ញុំ។

៣- អ្នកមានគុណបានចិញ្ចឹមបីបាច់ថែរក្សាខ្ញុំ។

៤- យើងត្រូវមានចិត្តកតញ្ញូចំពោះអ្នកមានគុណដូចជា ស្ដាប់បង្គាប់ ខំរៀនសូត្រ ជួយធ្វើកិច្ចការងារផ្ទះ តបស្នងសងគុណគាត់។

---

## ចំណ្ណាសាទី១២

(ពិន្ទុសរុប: ១០ពិន្ទុ  រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

### ការភ្ញាក់រឭក

ណារីឃើញកុមារម្នាក់ខ្ជិលច្រអូសក្នុងការរៀនសូត្រ ហើយថែមទាំងខ្ជិលសម្អាតខ្លួនប្រាណទៀតផង។ មុនពេលហូបអាហារ គេមិនដែលលាងដៃនឹងសាប៊ូទេ។ ក្រោយមក សុខភាពវាទ្រុឌទ្រោមនិងចុះខ្សោយជាលំដាប់។ បន្ទាប់ពីបានទទួលការណែនាំអំពីការថែទាំសុខភាព និងការរស់នៅស្អាតរួចមក កុមាររូបនោះមានការភ្ញាក់រឭក និងអនុវត្តតាមក្បួនអនាម័យ សុខភាពវាក៏ល្អឡើងវិញ។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : រឭក ខ្ជិល។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ខ្សោយ ខ្ជិល។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ដៃ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : រស់។

**ខ.២- សំណួរ**

១- តើណារីឃើញនរណា?

២- តើកុមារដែលខ្ជិលច្រអូសមានសុខភាពដូចម្ដេច?

៣- ក្រោយពីទទួលការណែនាំអំពីការថែទាំសុខរួចមក តើកុមារនោះមានសុខភាពដូចម្ដេច?

៤- តើប្អូនៗត្រូវធ្វើដូចម្ដេចខ្លះទើបទទួលបានសុខភាពល្អ?

## កំណែចំណ្ណាសាទី១២

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- រឭក : គិតដល់ នឹកដល់។

---

- ខ្ជិល : ដែលមិនចូលចិត្តធ្វើការ ឬធុញទ្រាន់ ស្អប់ការងារ។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ)* ៖

- ខ្សោយ ≠ ខ្លាំង
- ខ្ជិល ≠ ឧស្សាហ៍។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ* ៖ ដៃ : ហត្ថ ហស្ត ព្រះហស្ត ករ។

*ខ.១.៤- សទិសសព្ទ (សទិសសូរ)នឹងពាក្យ* ៖

- រស់ : មានជីវិតនៅ មិនទាន់ស្លាប់។
- រស : ការប៉ះពាល់នឹងអណ្តាតដឹងប្រៃ ផ្អែម ជូរជាដើម។
- រួស : រហ័ស ឆាប់។

**ខ.២- ចម្លើយ**

១- ណារីឃើញកុមារម្នាក់ខ្ជិលច្រអូសក្នុងការរៀនសូត្រ។

២- កុមារដែលខ្ជិលច្រអូសសុខភាពវាទ្រុឌទ្រោមនិងចុះខ្សោយជាលំដាប់។

៣- ក្រោយពីទទួលការណែនាំអំពីការថែទាំសុខរួចមកកុមារនោះមានសុខភាពល្អប្រសើរឡើងវិញ។

៤- ដើម្បីទទួលបានសុខភាពល្អយើងត្រូវហាត់ប្រាណ អនាម័យខ្លួនប្រាណ មិនជក់បារី មិនសេព គ្រឿងញៀន។

---

## **វិញ្ញាសាទី១៣**

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**កិច្ចការនៅផ្ទះ**

រៀនរួចរូតរះ ជួយកិច្ចការផ្ទះ ម៉ាក់ប៉ាលោកប្រើ
ជួយតាមកម្លាំង កុំគិតគេចដើរ ទើបគេសរសើរ
ថាជាបុត្រល្អ។
កូនល្អចេះជួយ ខិតខំលើកស្ទួយ គ្រួសារបវរ
ស្តាប់ដំបូន្មាន ដោយចិត្តស្មោះសរ ពុកម៉ែត្រេកអរ
គ្រួសារសុខសាន្ត។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ស្មោះសរ ស្ទួយ។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : សរសើរ ល្អ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ម៉ាក់ប៉ា។

---

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ជា។

**ខ.២- សំណួរ**

១- តើពេលរៀនរួចគេប្រញាប់ទៅណា?

២- តើគេសរសើរថាដូចម្ដេចនៅពេលយើងមិនគេចដើរ?

៣- តើកូនល្អត្រូវធ្វើដូចម្ដេច?

៤- តើប្អូនៗត្រូវធ្វើដូចម្ដេចខ្លះដើម្បីឱ្យគ្រួសារបានសុខសាន្ត?

## កំណែវចញ្ញាសាទី១៣

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ស្មោះសរ : សេចក្ដីរីករាយរាក់ទាក់។
- ស្ទួយ : លើកតម្កើង។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖*

- សរសើរ ≠ បង្អាប់
- ល្អ ≠ អាក្រក់។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖*

- ម៉ាក់ប៉ា : មាតាបិតា ញោមប្រុសញោមស្រី ម្ដាយឪពុក ម៉ែឪ។

*ខ.១.៤- សទិសសព្ទ (សទិសសូរ )នឹងពាក្យ ៖*

- ជា : រួចពីឈឺ។
- ចៀរ : ចិត្ត ឬកាត់ឱ្យជាចំនៀរ។

**ខ.២- ចម្លើយ**

១- ពេលរៀនរួចគេប្រញាប់ទៅជួយកិច្ចការផ្ទះ។

២- នៅពេលយើងមិនគេចដើរគេសរសើរថាជាបុត្រល្អ។

៣- កូនល្អត្រូវស្ដាប់ដំបូន្មានឪពុកម្ដាយ។

៤- ដើម្បីឱ្យគ្រួសារបានសុខសាន្តយើងត្រូវចេះស្រឡាញ់គ្នា មិនត្រូវឈ្លោះប្រកែកគ្នា ត្រូវចេះជួយគ្នាទៅវិញទៅមក។

---

## វិញ្ញាសាទី១១៤

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

---

**មេរៀនកូនចាំ**

| | | |
|---|---|---|
| ម៉ែអើយស្ដាប់ខ្ញុំ | ពុកអើយកូនសុំ | ចង្អុលទិសប្រាប់ |
| តាមដែលកូនរៀន | ពុកប្រៀនម៉ែប្រាប់ | ថាបើនឹងរាប់ |
| | ទិសធំមានបួន។ | |
| ទិសបូព៌ទក្សិណ | បស្ចិមរាប់មិន | មានខុសនឹងក្បួន |
| ទើបដល់ឧត្ដរ | បន្តមិនស្ទួន | កូនចេះមាំមួន |
| | ទិសតូចបួនទៀត។ | |

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ក្បួន ស្ទួន។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : មាំមួន។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : មាំ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ប្រៀន។

**ខ.២- សំណួរ**

១- តើកូននិយាយពីអ្វីប្រាប់ឪពុកម្ដាយ?

២- តើទិសធំមានប៉ុន្មាន?

៣- តើទិសតូចមានប៉ុន្មាន?

៤- តើទិសទាំងអស់មានឈ្មោះអ្វីខ្លះ?

**កំណែវិញ្ញាសាទី១៤**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ក្បួន  : តម្រា។
- ស្ទួន  : ដែលលើសផ្ទួនដោយភាន់។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ)* ៖ មាំមួន ≠  ទន់ខ្សោយ។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ* ៖ មាំ :  រឹងប៉ឹង មាំទាំ មាំមួន។

*៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- ប្រៀន : ពាក្យសម្រាប់និយាយផ្សំជាមួយនឹងពាក្យអៀន។
- ព្រាន  : ប្រមាញ់ នេសាទ។

**ខ.២- ចម្លើយ**

១- កូននិយាយពីទិសប្រាប់ឪពុកម្ដាយ។

២- ទិសធំមានបួន។

៣- ទិសតូចមានបួន។

៤- ទិសទាំងអស់មានទិសបូព៌ អគ្នេយ៍ ទក្សិណ និរតី បស្ចិម ពាយ័ព្យ ឧត្តរ ឦសាន។

---

## **វិញ្ញាសាទី១៥**

(ពិន្ទុសរុប: ១០ពិន្ទុ  រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

### **អ្នកជិតខាងល្អ**

អ្នកជិតខាងល្អគឺជាអ្នកចេះគោរពរាប់អានគ្នា ស្រឡាញ់គ្នា ហើយចេះគួរសមមិនរើសអើងចំពោះគ្នា។ នៅពេលមានទុក្ខធុរៈផ្សេងៗ គេតែងតែជួយគ្នាទៅវិញទៅមក។ ពេលមានចំណី ឬម្ហូបអាហារឆ្ងាញ់ គេចេះចែករំលែកគ្នាហូប។ លើសពីនេះទៀត អ្នកជិតខាងល្អមានឫកពា អាកប្បកិរិយាសុភាពរាបសា និងសំដីទន់ភ្លន់ ដោយមិនទ្រគោះបោះបោកដាក់គ្នាដែលនាំឱ្យកើតជម្លោះ។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : រើសអើង ជម្លោះ។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ទន់ភ្លន់។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ស្រឡាញ់។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ទុក្ខ។

**ខ.២- សំណួរ**

១- តើអ្នកជិតខាងល្អគេធ្វើដូចម្ដេចខ្លះ?

២- តើនៅពេលមានទុក្ខធុរៈផ្សេងៗគេធ្វើដូចម្ដេច?

៣- តើនៅពេលមានចំណី ឬអាហារឆ្ងាញ់គេត្រូវធ្វើដូចម្ដេច?

៤- តើប្អូនៗត្រូវធ្វើដូចម្ដេចខ្លះដើម្បីកុំឱ្យកើតមានជម្លោះ?

### **កំណែវិញ្ញាសាទី១៥**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- រើសអើង : ប្រកាន់យកតែតាមគាប់ចិត្ត។
- ជម្លោះ   : វិវាទ ដំណើរឈ្លោះ។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* ទន់ភ្លន់  ≠ រឹងត្អឹង។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* ស្រឡាញ់ :  ចូលចិត្ត ស្នេហា ប្រតិព័ទ្ធ ប្រតិពន្ធ។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- ទុក្ខ  : សេចក្ដីព្រួយ សេចក្ដីលំបាក។
- ទុក  : ដាក់វត្ថុអ្វីក្នុងទីណាមួយដើម្បីឱ្យគង់នៅ ឬរក្សាអ្វីៗឱ្យគង់។

**ខ.២- ចម្លើយ**

១- អ្នកជិតខាងល្អគេចេះគោរពរាប់អានគ្នា ស្រឡាញ់គ្នា ហើយចេះគួរសមមិនរើសអើងចំពោះគ្នា។

២- នៅពេលមានទុក្ខធុរៈផ្សេងៗគេតែងតែជួយគ្នាទៅវិញទៅមក។

៣- នៅពេលមានចំណី ឬអាហារឆ្ងាញ់គេត្រូវចែករំលែកគ្នាហូប។

៤- ដើម្បីកុំឱ្យកើតមានជម្លោះយើងត្រូវចេះយោគយល់អធ្យាស្រ័យគ្នា មិនប្រើពាក្យទ្រគោះបោះបោក ដាក់គ្នា មិនរើសអើងចំពោះគ្នា។

---

## វិញ្ញាសាទី១៦

(ពិន្ទុសរុប: ១០ពិន្ទុ   រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

### បុណ្យដារលានលើភូមិខ្ញុំ

បុណ្យដារភូមិខ្ញុំ      មីងពូជួបជុំ      សប្បាយរីករាយ
នៅក្រោមដើមពោធិ៍      ញញឹមពព្រាយ      ខ្លះរែកទូលស្ពាយ
      នំម្ហូបអាហារ។
មីងពូទាំងអស់      ចាស់ទុំស្រីប្រុស      រួមទាំងអាចារ្យ
រាប់បាត្រព្រះសង្ឃ      បួងសួងទេវតា      ស្ដាប់លោកទេសនា
      ប្រាថ្នាសុខសាន្ត។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : បុណ្យដារ ស្ពាយ។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ជួប។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : បួងសួង។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : បាត្រ។

**ខ.២- សំណួរ**

១- តើបុណ្យដារលានធ្វើនៅឯណា?

២- តើមីងពូរែក ទូលអ្វី?

៣- តើមីងពូចាស់ទុំប្រុសស្រីទាំងអស់យកនំ ម្ហូបអាហារទៅធ្វើអ្វី?

៤- តើគេប្រារព្ធពិធីបុណ្យដារលានភូមិដើម្បីអ្វី?

---

## កំណែវិញ្ញាសាទី១៦

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- បុណ្យដារ : ឈ្មោះពិធីបុណ្យតូចម្យ៉ាងក្នុងព្រះពុទ្ធសាសនា ច្រើនរៀបចំនៅក្រោមដើមឈើធំៗ។
- ស្ពាយ : ពាក់បង្ហេច ឬគ្រឿងព្យួរលើស្មា។

*ខ.១.២- បដិសព្ទ(ពាក្យផ្ទុយ)* ៖ ជួប ≠ ព្រាត់។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ* ៖ បួងសួង: បន់ បន់ស្រន់ សំបួងសង្រួង។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ* ៖

- បាត្រ : ប្រដាប់សម្រាប់ដាក់ចង្ហាន់ព្រះសង្ឃ។
- បាត : ប៉ែកខាងក្រោមនៃជម្រៅ។
- បាទ : ពាក្យសម្រាប់បុរសឆ្លើយ។

**ខ.២- ចម្លើយ**

១- បុណ្យដារលានធ្វើនៅក្នុងភូមិ ក្រោមដើមពោធិ៍។

២- មីងពូរ៉ែក ទូលនំនិងម្ហូបអាហារ។

៣- មីងពូចាស់ទុំប្រុសស្រីទាំងអស់យកនំ ម្ហូបអាហារទៅរាប់បាត្រព្រះសង្ឃ។

៤- គេប្រារព្ធពិធីបុណ្យដារលានភូមិដើម្បីសុំសេចក្ដីសុខសេចក្ដីចម្រើន ជម្រះគ្រោះចង្រៃផ្សេងៗ។

---

## វិញ្ញាសាទី១៧

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

### ល្បែងបោះអង្គុញ

ពេលចូលឆ្នាំខ្មែរ គេនិយមលេងល្បែងប្រជាប្រិយ៍ជាច្រើនដូចជាបោះអង្គុញ់ ចោលឈូង ទាញព្រាត់ជាដើម។ គេលេងល្បែងបោះអង្គុញ់ដោយចែកគ្នាជាពីរក្រុម គឺមួយក្រុមជាបុរស និងមួយក្រុមទៀតជាស្ត្រី។ គេប្រើគ្រាប់អង្គុញ់សម្រាប់ដាំធ្វើជាកោយ និងគ្រាប់បោះ។ តាមទម្លាប់ប្រពៃណីខ្មែរគឺក្រុមឈ្នះត្រូវយកគ្រាប់អង្គុញ់ទៅជោះក្បាលជង្គង់ក្រុមចាញ់។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ : ៥ពិន្ទុ រយៈពេល : ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ល្បែង កោយ។

២- ចូររកបដិសព្ទ(ពាក្យផ្ទុយ)នឹងពាក្យ : ចាញ់។

៣- ចូររកវេវចនសព្ទ(សទិសន័យ)នឹងពាក្យ : ចោល។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ជោះ។

---

**ខ.២- សំណួរ**

១- តើនៅពេលចូលឆ្នាំខ្មែរគេនិយមលេងល្បែងប្រជាប្រិយ៍អ្វីខ្លះ?

២- តើគេលេងល្បែងបោះអង្គញ់ចែកចេញជាប៉ុន្មានក្រុម?

៣- តើគេប្រើគ្រាប់អង្គញ់សម្រាប់ធ្វើអ្វីខ្លះ?

៤- តើប្អូនស្គាល់ល្បែងប្រជាប្រិយ៍អ្វីខ្លះទៀតក្រៅពីអត្ថបទខាងលើ?

## កំណែវិញ្ញាសាទី១៧

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ល្បែង : ការលេង  អំពើដែលលេង។
- កោយ : មេអង្គញ់។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* ចាញ់  ≠ ឈ្នះ។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* ចោល : គប់ បោះ ពួយ។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- ដោះ : ឆ្កឹះ ចោះ គោះបំបែក។
- ជួស : ដាក់ជាជំនួស ជាតំណាង។

**ខ.២- ចម្លើយ**

១- នៅពេលចូលឆ្នាំខ្មែរគេនិយមលេងល្បែងប្រជាប្រិយ៍ បោះអង្គញ់ ចោលឈូង ទាញព្រាត់។ល។

២- គេលេងល្បែងបោះអង្គញ់ចែកចេញជាពីរក្រុម។

៣- គេប្រើគ្រាប់អង្គញ់សម្រាប់ដាំធ្វើជាកោយ និងគ្រាប់បោះ។

៤- ក្រៅពីអត្ថបទខាងលើខ្ញុំស្គាល់ល្បែងប្រជាប្រិយ៍មួយចំនួនទៀតដូចជា ស្តេចចង់ លាក់កន្សែង លោតអន្ទាក់ជាដើម។

---

## វិញ្ញាសាទី១៨

(ពិន្ទុសរុប : ១០ពិន្ទុ   រយៈពេល : ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

### ទឹកជំនន់ភូមិខ្ញុំ

ភូមិមួយចំនួនត្រូវលិចលង់ស្ទើរតែទាំងអស់។ អ្នកភូមិបានជញ្ជូនកូនចៅ សត្វពាហនៈ គោ ក្របី និង ជ្រូក មាន់ ទា ព្រមទាំងសម្ភារៈឧបករណ៍ប្រើប្រាស់សំខាន់ៗទៅទីទួលដែលមានសុវត្ថិភាព។ គ្រោះទឹកជំនន់ធ្វើឱ្យមានផលប៉ះពាល់ដល់អាយុជីវិតមនុស្ស សត្វ រុក្ខជាតិ  និងបំផ្លាញនូវហេដ្ឋារចនាសម្ព័ន្ធ ស្ពាន ផ្លូវជាច្រើន។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : សុវត្ថិភាព សម្ព័ន្ធ។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : លិច។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ពាល់។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : គ្រោះ។

**ខ.២- សំណួរ**

១- តើភូមិមួយចំនួនលិចលង់បណ្តាលមកពីអ្វី?

២- តើអ្នកភូមិនាំកូនចៅទៅណា?

៣- តើគ្រោះទឹកជំនន់ធ្វើឱ្យប៉ះពាល់ដល់អ្វីខ្លះ?

៤- តើទឹកជំនន់បណ្តាលមកពីអ្វី?

**កំណែចញ្ញាសាទី១៨**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- សុវត្ថិភាព :  ការប្រកបដោយសេចក្តីសុខ។
- សម្ព័ន្ធ     :  ការចងភ្ជាប់គ្នា។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* លិច ≠ អណ្តែត។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* ពាល់ :  ប៉ះ ស្ទាប អង្អែល។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- គ្រោះ: ថ្នាំងថ្នាក់ដែលកើតមានក្នុងកាលម្តងៗតាមដំណើរអំពើអាក្រក់ ល្អរបស់បុគ្គលរាល់រូប។
- ក្រួស: ជាតិថ្មប្រាំងមានសាច់រឹងឈរ មានសណ្ឋានជាដុំតូចៗ មូលខ្លះ សំប៉ែតខ្លះច្រើនដុះកើតក្នុងទឹក។

**ខ.២- ចម្លើយ**

១- ភូមិមួយចំនួនលិចលង់បណ្តាលមកពីទឹកជំនន់។

២- អ្នកភូមិនាំកូនចៅទៅទីទួលដែលមានសុវត្ថិភាព។

៣- គ្រោះទឹកជំនន់ធ្វើឱ្យប៉ះពាល់ដល់អាយុជីវិតមនុស្ស សត្វ រុក្ខជាតិ និងបំផ្លាញនូវហេដ្ឋារចនាសម្ព័ន្ធ ស្ពាន ផ្លូវជាច្រើន។

៤- ទឹកជំនន់បណ្តាលមកពីការប្រែប្រួលអាកាសធាតុ ការបំផ្លាញធនធានធម្មជាតិជាដើម។

---

**ចញ្ញាសាទី១៩**

(ពិន្ទុសរុប: ១០ពិន្ទុ   រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

## មុខរបររអ្នកភូមិខ្ញុំ

ការជ្រើសរើសអាជីពមួយសម្រាប់ខ្លួន ឬគ្រួសារគឺជាប្រការល្អដើម្បីអភិវឌ្ឍសេដ្ឋកិច្ចគ្រួសារឱ្យមានជីវភាពធូរធារ។ ពូសៅនិងមីងសាន ក្រៅពីធ្វើស្រែគាត់បានចិញ្ចឹមត្រីក្នុងស្រះមួយក្បែរភូមិ ។ ពួកគាត់បានរៀនពីរបៀបផលិតចំណីត្រីដោយខ្លួនឯង។ ពូសៅតែងតែកាប់ជម្រះស្មៅនិងព្រៃតូចៗដើម្បីឱ្យមានខ្យល់អុកស៊ីសែនគ្រប់គ្រាន់ចូលដល់ក្នុងស្រះ។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : អភិវឌ្ឍ ជម្រះ។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ធូរធារ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : អាជីព។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : សារ។

**ខ.២- សំណួរ**

១- តើការជ្រើសរើសអាជីពមួយ សម្រាប់ខ្លួនធ្វើឱ្យសេដ្ឋកិច្ចគ្រួសារមានជីវភាពដូចម្តេច?

២- តើពូសៅនិងមីងសានបានចិញ្ចឹមអ្វីក្នុងអ្វី?

៣- តើពូសៅកាប់ជម្រះស្មៅនិងព្រៃតូចៗដើម្បីអ្វី?

៤- តើនៅផ្ទះប្អូនៗធ្វើការងារអ្វីខ្លះ?

## កំណែវិញ្ញាសាទី១៩

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- អភិវឌ្ឍ : ចម្រើនក្រៃលែង។
- ជម្រះ : ធ្វើឱ្យដាច់ស្រេច។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* ធូរធារ ≠ ខ្វះខាត។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* អាជីព : មុខរបរ ការងារ មុខងារ។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- សារ : សំបុត្រ។
- ស្រា : ស្រូវ ឬដំណាំពួកខ្លះដែលដុះលូតលាស់តពីគល់ចាស់ ឬពីជញ្ជ្រាំងស្រស់។
- សា : ឈ្មោះជំងឺខ្យល់ពួកមួយចាប់សត្វចតុប្បាទមានគោក្របីជាដើម។

**ខ.២- ចម្លើយ**

១- ការជ្រើសរើសអាជីពមួយសម្រាប់ខ្លួនធ្វើឱ្យសេដ្ឋកិច្ចគ្រួសារមានជីវភាពធូរធារ។

២- ពូសៅនិងមីងសានបានចិញ្ចឹមត្រីក្នុងស្រះ។

៣- ពូសៅកាប់ជម្រះស្មៅនិងព្រៃតូចៗ ដើម្បីឱ្យមានខ្យល់អុកស៊ីសែនគ្រប់គ្រាន់ចូលដល់ក្នុងស្រះ។

៤- នៅផ្ទះខ្ញុំជួយធ្វើការងារឪពុកម្ដាយដូចជា បោសផ្ទះ ដងទឹកដាក់ពាង ដាំបាយឃ្វាលគោជាដើម។

---

## **ចំណាំសាទី២០**

(ពិន្ទុសរុប: ១០ពិន្ទុ  រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

### **ការលក់ដូរ**

ព្រឹកនេះសុភាទំនេរពីការសិក្សា នាងបានឆ្លៀតពេលទៅជួយម្ដាយលក់ដូរនៅឯផ្សារ។ សុភានិងម្ដាយក្រោកពីនិទ្រាតាំងពីព្រលឹមអរុ រៀបចំបន្លែ ត្រី សាច់ និងគ្រឿងទេសដាក់លើរទេះ ដើម្បីយកទៅលក់។ នៅក្នុងផ្សារមានមនុស្សច្រើនកុះករ ស្លៀកពាក់ស្អាតបាត ដើរទិញម្ហូបអាហារប្រចាំថ្ងៃ និងទិញអីវ៉ាន់ប្រើប្រាស់ផ្សេងៗ។ សុភាមានទឹកមុខញញឹមញញែម ដោយមានភ្ញៀវចូលទិញជាហូរហែ។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : និទ្រា អីវ៉ាន់។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ញញឹម។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : និទ្រា។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ផ្សារ។

**ខ.២- សំណួរ**

១- តើពេលទំនេរសុភាជួយលក់ដូរម្ដាយនៅឯណា?

២- តើសុភានិងម្ដាយក្រោកពីនិទ្រាតាំងពីពេលណា?

៣- តើសុភាមានទឹកមុខដូចម្ដេច?

៤- តើប្អូនៗត្រូវធ្វើដូចម្ដេចខ្លះដើម្បីឱ្យការលក់ដូររបស់យើងលក់ដាច់?

### **កំណែចំណាំសាទី២០**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- និទ្រា : ដំណើរដេកលក់។
- អីវ៉ាន់ : វត្ថុឬរបស់នេះខ្លះនោះខ្លះពុំចេញឈ្មោះ។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* ញញឹម  ≠ ស្រពោន។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* និទ្រា:  ដេក គេង ផ្ទំ សឹង។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- ផ្សារ :  ភ្ជាប់ភ្ជិតដោយទឹកបន្សារ។

---

- ផ្សារ  : ទីប្រជុំលក់ ទិញរបស់ផ្សេងៗ។
- ផ្សា  :  ឈើចាប់ពើតរោលរាលផៀបៗដោយមុខរបួស។

**ខ.២- ចម្លើយ**

១- នៅពេលទំនេរសុភាជួយលក់ដូរម្ដាយនៅឯផ្សារ។

២- សុភានិងម្ដាយក្រោកពីនិទ្រាតាំងពីពេលព្រលឹមអុរ។

៣- សុភាមានទឹកមុខញញឹមញញែម។

៤- ដើម្បីឱ្យការលក់ដូរលក់ដាច់យើងត្រូវរាក់ទាក់ ទន់ភ្លន់ចំពោះភ្ញៀវ មិនប្រកាន់ឫកពារមិនឆ្មើងឆ្មៃ។

---

## ចញ្ញាសាទី២១

(ពិន្ទុសរុប: ១០ពិន្ទុ  រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ការហាត់ប្រាណ**

រាល់ព្រឹកសុខានិងប្អូនក្រោកពីព្រលឹម។ ភ្លឺស្រាងៗមុនព្រះអាទិត្យរះគេរៀបចំបត់ភួយ សាមុង មូរកន្ទេល រៀបខ្នើយទុកដាក់យ៉ាងមានរបៀប។ បន្ទាប់មកពួកគេ នាំគ្នាទៅហាត់ប្រាណក្នុងទីធ្លាខាងមុខផ្ទះមុនទៅសាលា។ សុខានិងដារីមានសុខភាពល្អពុំដែលឈឺទេ ព្រោះគេទាំងពីរនាក់ហាត់ប្រាណបានទៀត។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ព្រលឹម សុខភាព។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : រះ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ផ្ទះ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : បត់។

**ខ.២- សំណួរ**

១- តើមុនព្រះអាទិត្យរះសុខានិងប្អូនរៀបចំបត់អ្វី?

២- តើមុនពេលទៅសាលាពួកគេធ្វើអ្វី?

៣- តើសុខានិងដារីមានសុខភាពដូចម្ដេច?

៤- តើប្អូនត្រូវធ្វើដូចម្ដេចខ្លះដើម្បីឱ្យមានសុខភាពល្អ?

## កំណែចញ្ញាសាទី២១

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ព្រលឹម : វេលាជាខាងដើមនៃថ្ងៃ គឺពេលដែលព្រះអាទិត្យទើបនឹងរះឃើញព្រឹមៗ។

- សុខភាព : ភាពជាសុខ សេចក្តីសុខ។

ខ.១.២- *បដិសព្ទ (ពាក្យផ្ទុយ)* ៖ រះ ≠ លិច។

ខ.១.៣- *វេវចនសព្ទ (សទិសន័យ) នឹងពាក្យ* ៖ ផ្ទះ : គេហដ្ឋាន លំនៅដ្ឋាន សម្បុក ខ្ទម ភូមិគ្រឹះ។

ខ.១.៤- *សទិសសព្ទ (សទិសសូរ) នឹងពាក្យ* ៖

- បត់ : ត្រឡប់តាមទំនង តាមផ្លូវដដែលមកវិញ។
- បទ : លំនាំនៃសំឡេងដែលសូត្រ ឬដែលច្រៀង។
- បថ : ផ្លូវ ឬគន្លង។

**ខ.២- ចម្លើយ**

១- មុនព្រះអាទិត្យរះសុខានិងប្អូនរៀបចំបត់ភួយ សាមុង មុងកន្ទេល រៀបខ្នើយទុកដាក់យ៉ាងមាន របៀប។

២- មុនពេលទៅសាលាពួកគេនាំគ្នាទៅហាត់ប្រាណក្នុងទីធ្លាខាងមុខផ្ទះ។

៣- សុខានិងដារីមានសុខភាពល្អ ពុំដែលឈឺទេ។

៤- ដើម្បីឱ្យមានសុខភាពល្អយើងត្រូវហាត់ប្រាណ ញ៉ាំអាហារមានអនាម័យរស់នៅស្អាត។

---

## **ចញ្ញាសាទី២២**

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

### **យើងទៅមណ្ឌលសុខភាព**

កូនចៅប្រុសស្រី ជំងឺសព្វថ្ងៃ មានច្រើនកន្លង
តាមមកយាយី ដល់មនុស្សសត្វផង ដើម្បីចម្លង
រោគាដល់យើង។

បើមានបញ្ហា ចុកចាប់កាយា ត្រូវឆាប់រូតរះ
ទៅមណ្ឌលសុខភាព ឱ្យបានរហ័ស ជំងឺជាសះ
សុខភាពបវរ។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ជំងឺ រហ័ស។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ថ្ងៃ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : រូតរះ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : សប់។

**ខ.២- សំណួរ**

១- តើជំងឺតាមយាយីនរណាខ្លះ?

២- តើជំងឺចម្លងអ្វីដល់យើង?

៣- តើនៅពេលមានជំងឺកើតឡើងយើងត្រូវទៅកន្លែងណា?

៤- តើប្អូនៗត្រូវធ្វើដូចម្ដេចដើម្បីកុំឱ្យឆ្លងជំងឺ?

## កំណែចញ្ញាសាទី២២

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ជំងឺ : ភាវៈឈឺ សេចក្ដីឈឺចាប់។
- របើស: ដែលមិនយឺត លឿន។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* ថ្ងៃ ≠ យប់។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖ រូតរះ* : ស្រូតរូត រៀសរវៃ ម៉ីម៉ា។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- សប់ : ស្រូបដោយស្នប់ ទាញរុញដៃស្នប់រើយៗឱ្យមានខ្យល់។
- សព្វ : ទាំងមូល ទាំងអស់ ទាំងគ្រប់។

**ខ.២- ចម្លើយ**

១- ជំងឺតាមយាយីដល់មនុស្សសត្វ។

២- ជំងឺបានចម្លងរោគាដល់យើង។

៣- នៅពេលមានជំងឺកើតឡើងយើងត្រូវទៅមណ្ឌលសុខភាព។

៤- ដើម្បីកុំឱ្យឆ្លងជំងឺយើងត្រូវដេកដាក់មុង ប្រមូលសម្បកកំប៉ុង សំបកកង់ដុតបំផ្លាញចោល។

---

## ចញ្ញាសាទី២៣

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

### ទោសនៃគ្រឿងញៀន

ពេលត្រឡប់ពីសាលាវិញ ជំនិតបានឃើញនគរបាលនាំខ្លួនបុរសម្នាក់ចូលសាលាឃុំ ដែលមានរាងកាយស្គមស្គាំង ទឹកមុខស្លេកស្លាំង។ បុរសនោះជាអ្នកប្រើប្រាស់គ្រឿងញៀន។ ជំនិតបានប្រាប់ហេតុការណ៍នេះដល់ម្ដាយរបស់គេ។ ម្ដាយជំនិតពន្យល់ថា ការប្រើប្រាស់គ្រឿងញៀនមិនល្អទេកូន! គឺនាំឱ្យអន្តរាយដល់សុខភាព បាត់បង់ការចងចាំ វង្វេងស្មារតី ឆេវឆាវ បំផ្លាញទ្រព្យសម្បត្តិ និងថវិកាគ្រួសារ។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

---

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ហេតុការណ៍ ស្មារតី។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ចាំ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : អន្តរាយ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ញៀន។

**ខ.២- សំណួរ**

១- តើពេលត្រឡប់ទៅផ្ទះវិញជំនិតបានឃើញអ្វី?

២- តើអ្នកប្រើប្រាស់គ្រឿងញៀនមានរាងកាយដូចម្តេច?

៣- តើម្តាយជំនិតបានពន្យល់កូនដូចម្តេចខ្លះពីបញ្ហាគ្រឿងញៀន?

៤- តើប្អូនត្រូវធ្វើដូចម្តេចខ្លះដើម្បីចៀសឆ្ងាយពីគ្រឿងញៀន?

**កំណែវចញ្ញាសាទី២៣**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ហេតុការណ៍ : រឿងរ៉ាវដែលកើតឡើងដោយហេតុផ្សេងៗ។
- ស្មារតី : សេចក្តីនឹកឃើញ ការចាំបាន។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* ចាំ ≠ ភ្លេច។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* អន្តរាយ : វិនាស ហិនហោច ខូចខ្ទី បាត់បង់។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- ញៀន : ជាប់តិត្តដោយមានចំណង់ អត់មិនបានដោយធ្លាប់ប្រព្រឹត្ត។
- ញាណ: សេចក្តីដឹង ប្រាជ្ញា។

**ខ.២- ចម្លើយ**

១- ពេលត្រឡប់ទៅផ្ទះវិញជំនិតបាន ឃើញនគរបាលនាំខ្លួនបុរសម្នាក់ចូលសាលាឃុំ។

២- អ្នកប្រើប្រាស់គ្រឿងញៀនមានរាងកាយស្គមស្គាំង ទឹកមុខស្លេកស្លាំង។

៣- ម្តាយជំនិតបានពន្យល់កូនថា ការប្រើគ្រឿងញៀននាំឱ្យអន្តរាយដល់សុខភាព បាត់បង់ការចងចាំ វង្វេងស្មារតី ឆេវឆាវ បំផ្លាញទ្រព្យសម្បត្តិ និងថវិកាគ្រួសារ។

៤- ដើម្បីចៀសឱ្យឆ្ងាយពីគ្រឿងញៀនយើងមិនត្រូវសេពគប់ជាមួយមិត្តភក្តិមិនល្អ ខិតខំរៀនសូត្រ និងមិនដើរលេងច្រើន។

---

**វិញ្ញាសាទី២៤**

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

---

**ច្បាប់ក្រមង៉ុយ**

ឯអ្នកប្រមឹក ប្រមូលកនធឹក ផ្ញើភឿននឹងក្មេង
សម្ដីច្រើនតឹង ស្រវឹងវង្វេង ជំហរអួតក្មេង
មិនចេះក្រក្សត់។
អួតទាំងបំពាន ធឹកម៉្វៃលុយមាន ធឹកម៉្វៃលុយអត់
ឯងចេះតែកិន ចិនចេះតែកត់ ធឹកដល់កំណត់
យកស្រែបញ្ចាំ។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ប្រមឹក បំពាន។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ធំធេង ពូកែ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : លុយ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : នាក់។

**ខ.២- សំណួរ**

១- តើអ្នកប្រមឹកចូលចិត្តធ្វើអ្វី?

២- តើអ្នកប្រមឹកច្រើនមានសម្ដីដូចម្ដេច?

៣- តើគេធ្វើអ្វីនៅពេលអស់លុយផឹក?

៤- តើស្រាផ្ដល់ផលពិបាកអ្វីខ្លះ?

**កំណែបញ្ហាសាធិ២៤**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ប្រមឹក : អ្នកដែលកាន់ទម្លាប់ផឹកស្រាដល់ស្រវឹង ដែលញៀន ឬជាប់សុរា។
- បំពាន : ពានពារលើ រំលោបលើ។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖*

- ធំធេង ≠ តូចចង្អៀត
- ពូកែ ≠ អន់។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* លុយ : ប្រាក់ រូបិយបណ្ណ។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- នាក់ : ពាក្យសម្រាប់ប្រើដាក់ខាងចុងចំនួនលេខ ដើម្បីឱ្យដឹងចំនួនមនុស្ស។
- អ្នក : ពាក្យប្រើជាជំនួសឈ្មោះបុគ្គលដែលត្រូវនិយាយទៅរកក្នុងទីចំពោះមុខ។

**ខ.២- ចម្លើយ**

១- អ្នកប្រមឹកចូលចិត្តប្រមូលគនធឹក។

២- អ្នកប្រមឹកច្រើនមានសម្តីច្រើនតឹង។

៣- នៅពេលអស់លុយផឹកគេយកស្រែបញ្ចាំ។

៤- ស្រាផ្តល់ផលប៉ះពាល់ដល់សុខភាព មានអំពើហិង្សាក្នុងគ្រួសារ និងសង្គមជាតិផងដែរ។

---

## **ខណ្ឌសាទី២៥**

(ពិន្ទុសរុប: ១០ពិន្ទុ   រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

### **សិប្បកម្មថ្មកែវ**

សិប្បកម្ម ជាកន្លែងផលិតកម្មធុនតូច។ នៅខេត្តពោធិ៍សាត់ មានឈ្មោះល្បីល្បាញតាំងពីយូរលង់មក ហើយពីចម្លាក់ថ្មកែវ។ ចម្លាក់នេះធ្វើឱ្យភ្ញៀវទេសចរចាប់អារម្មណ៍យ៉ាងខ្លាំងពីស្នាដៃមរតកដូនតាយើង។ ថ្មកែវជាប្រភេទថ្មធម្មជាតិដែលមានពណ៌ចម្រុះភ្លឺរលោង អាចយកមកឆ្លាក់ធ្វើជារូបសំណាកផ្សេងៗ។ សិប្បកម្មថ្មកែវបានលើកស្ទួយកម្រិតជីវភាពប្រជាជនក្នុងស្រុកភ្នំក្រវាញឱ្យកាន់តែសម្បូរធូរធារ។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : សិប្បកម្ម ល្បីល្បាញ។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ខ្លាំង សម្បូរ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ប្រជាជន។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ពី។

**ខ.២- សំណួរ**

១- តើថ្មកែវមានឈ្មោះល្បីល្បាញនៅក្នុងខេត្តណា?

២- តើថ្មកែវជាប្រភេទថ្មដូចម្តេច?

៣- តើថ្មកែវគេយកទៅឆ្លាក់ធ្វើអ្វី?

៤- តើសិប្បកម្មថ្មកែវផ្តល់ផលប្រយោជន៍អ្វីខ្លះដល់សង្គម?

### **កំណែខណ្ឌសាទី២៥**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- សិប្បកម្ម : ជំនាញ ការងារផ្សេងៗ។
- ល្បីល្បាញ : លេចឮកេរ្តិ៍ឈ្មោះល្អ ឬអាក្រក់។

---

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ)* ៖

- ខ្លាំង ≠ ខ្សោយ
- សម្បូរ ≠ ក្សត់។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ* ៖ ប្រជាជន: ប្រជារាស្ត្រ ប្រជាពលរដ្ឋ។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ* ៖

- ពី : អំពី ខាង ឯ។
- ពីរ : មួយគូបគ្នាគឺមួយនិងមួយ (២)។

**ខ.២- ចម្លើយ**

១- ថ្មកែវមានឈ្មោះល្បីល្បាញនៅក្នុងខេត្តពោធិ៍សាត់។

២- ថ្មកែវជាប្រភេទថ្មធម្មជាតិ។

៣- ថ្មកែវគេយកទៅឆ្លាក់ធ្វើជារូបសំណាកផ្សេងៗ។

៤- សិប្បកម្មថ្មកែវផ្តល់ផលប្រយោជន៍ក្នុងការទាក់ទាញភ្ញៀវទេសចរណ៍ កំណើនសេដ្ឋកិច្ចដល់សង្គម។

---

## **ចំណាសាទី២៦**

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

### **ដំណាំដំឡូងមី**

បច្ចុប្បន្ននេះ ដំឡូងមីកំពុងមានតម្រូវការខ្ពស់។ គេយកមើមដំឡូងមីទៅបញ្ចូលក្នុងរោងចក្រដើម្បីកែច្នៃចំណីសត្វ និងផលិតជាម្សៅមី។ លើសពីនេះម្សៅដំឡូងមីមានសារៈសំខាន់ក្នុងការធ្វើជានំចំណីសម្រាប់បរិភោគមានដូចជា នំបុ័ង នំប៉ាវ មីជាដើម។ មុខរបរដាំដំឡូងមី ជាជម្រើសថ្មីរបស់កសិករដើម្បីបង្កើនប្រាក់ចំណូលរបស់ពួកគាត់។ ដើម្បីរក្សាទុកដំឡូងមីឱ្យបានយូរ គេត្រូវការឡចំហុយសម្ងួត។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : បច្ចុប្បន្ន ជម្រើស។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ចំណូល។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : បរិភោគ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : កំពុង។

**ខ.២- សំណួរ**

១- តើគេយកដំឡូងមីទៅច្នៃធ្វើអ្វី?

២- តើកសិករដាំដំឡូងមីដើម្បីអ្វី?

---

៣- តើគេត្រូវធ្វើដូចម្តេចដើម្បីរក្សាទុកដំឡូងមីឱ្យបានយូរ?

៤- តើនៅភូមិរបស់ប្អូនគេដាំដំឡូងមីដោយវិធីណា?

## កំណែវចនានុក្រមទី២៦

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- បច្ចុប្បន្ន : ពេលដែលកំពុងតែមាននៅចំពោះមុខគឺពេលឥឡូវនេះ។
- ជម្រើស : របស់ដែលបានជ្រើស វត្ថុដែលបានជ្រើសរួច។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ)* ៖ ចំណូល ≠ ចំណាយ។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖*

- បរិភោគ : ញ៉ាំ ស៊ី ហូប ពិសា ឆី ទទួលទាន ឆាន់ សោយ។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- កំពុង : កាលដែលជាប់នៅក្នុងរវាង។
- កំពង់ : ទីកន្លែងនៅមាត់ទឹកដែលជនានុជនចុះឡើង ឬចតទូកជាដើម។

**ខ.២- ចម្លើយ**

១- គេយកដំឡូងមីទៅច្នៃធ្វើជាចំណីសត្វ និងផលិតជាម្សៅមី។

២- កសិករដាំដំឡូងមីដើម្បីបង្កើនប្រាក់ចំណូល។

៣- ដើម្បីរក្សាទុកដំឡូងមីឱ្យបានយូរគេត្រូវគេត្រូវការឡចំហុយសម្ងួត។

៤- នៅភូមិរបស់ខ្ញុំគេដាំដំឡូងមីដោយលើករង ឬជីករណ្តៅ ។

---

## វចនានុក្រមទី២៧

(ពិន្ទុសរុប: ១០ពិន្ទុ  រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

### សុជីវធម៌តាមទីសាធារណៈ

ពេលមិត្តឃើញចាស់ជរា    គ្រាំគ្រាតូចធំទាបខ្ពស់
មិនគួរមិនសមធ្វើសោះ    ប៉ះពាល់កិត្តិយសនាំឱ្យថ្នាំងថ្នាក់។
កុមារាកុមារី    ឃ្មាតខ្មីរួសរាយរាក់ទាក់
ទើបក្លាយជាពលរដ្ឋម្នាក់    មានសុជីវធម៌ជាក់ក្នុងសង្គមខ្មែរ។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ជរា កិត្តិយស។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : មិត្ត។

---

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ចាស់។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ទាប។

**ខ.២- សំណួរ**

១- តើមិត្តឃើញអ្នកណា?

២- តើកុមារាកុមារីធ្វើដូចម្តេចនៅពេលឃើញចាស់ជរា?

៣- តើប្អូនត្រូវធ្វើដូចម្តេច ដើម្បីក្លាយខ្លួនជាពលរដ្ឋល្អម្នាក់?

៤- តើប្អូនត្រូវមានសុជីវធម៌បែបណានៅតាមទីសាធារណៈ?

## កំណែចញ្ញាសាទី២៧

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ជរា : សេចក្តីគ្រាំគ្រា ទ្រុឌទ្រោម ទ្រម។
- កិត្តិយស : យសសក្តិដែលល្បីទូទៅ កេរ្តិ៍ឈ្មោះរុងរឿង។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* មិត្ត ≠ សត្រូវ។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* ចាស់ : ចំណាស់ ជរា។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- ទាប : ទីទៃពីខ្ពស់ គឺតិចកម្ពស់ តិចជំហរ។
- ទៀប : ឈ្មោះឈើដំណាំមួយប្រភេទ ស្លឹកទ្រវែងស្រួច ក្លិនក្រពុល។
- ទៀប : ជិត ឬកៀរ (ទៀបភ្លឺ)។

**ខ.២- ចម្លើយ**

១- មិត្តឃើញចាស់ជរា។

២- នៅពេលឃើញចាស់ជរាកុមារាកុមារីត្រូវរួសរាយរាក់ទាក់។

៣- ដើម្បីក្លាយខ្លួនជាពលរដ្ឋល្អម្នាក់យើងត្រូវមានសុជីវធម៌ក្នុងសង្គម។

៤- នៅតាមទីសាធារណៈយើងត្រូវមានសុជីវធម៌ដូចជា ចេះគោរពចាស់ទុំ ចេះរាក់ទាក់ ចេះគួរសម។

---

## ចញ្ញាសាទី២៨

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

### ស្លាកសញ្ញាសុវត្ថិភាពនានា

ស្លាកសញ្ញាអាចប្រើសម្រាប់ផ្តល់ព័ត៌មានជំនួសការនិយាយ ការសរសេរ និងកាយវិការបាន។ ស្លាកសញ្ញាមានច្រើនដូចជា ស្លាកសញ្ញាចរាចរណ៍ ស្លាកសញ្ញាអាសន្ន និងស្លាកសញ្ញាគ្រោះថ្នាក់ជាដើម។ ស្លាក

សញ្ញាគ្រោះថ្នាក់មានច្រើនប្រភេទដូចជា ស្លាកសញ្ញាក្បាលខ្មោច ស្លាកសញ្ញាការដ្ឋានសំណង់ ស្លាកសញ្ញាគូសខ្វែង។ល។ ជួនកាលគេគរមែកឈើជាសញ្ញាប្រាប់ថាទីនោះមានបញ្ហា។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ជំនួស អាសន្ន។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : គ្រោះថ្នាក់ ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : និយាយ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : គរ។

**ខ.២- សំណួរ**

១- តើគេប្រើអ្វីសម្រាប់ផ្តល់ព័ត៌មានជំនួសការនិយាយ ការសរសេរ និងកាយវិការបាន?

២- តើស្លាកសញ្ញាមានអ្វីខ្លះ?

៣- តើផ្លាកសញ្ញាគ្រោះថ្នាក់មានប៉ុន្មានប្រភេទ?

៤- តើប្អូនត្រូវធ្វើដូចម្តេចនៅពេលឃើញសញ្ញាគ្រោះថ្នាក់?

## កំណែបញ្ញាសាទី២៨

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ជំនួស : រូបដែលជួស អ្នកចាត់ការជួស។
- អាសន្ន : ហេតុ ឬអ្វីដែលគួរឱ្យខ្លាចនៅជិតបង្កើយ ឬតាមប្រកិតជិតមកៗ។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* គ្រោះថ្នាក់ ≠ សុវត្ថិភាព។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* និយាយ : ប្រសាសន៍ ដីកា ថា ព្រះបន្ទូល។

*៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- គរ : ធ្វើឱ្យជាគំនរ។
- គ : មនុស្សឥតសម្តី។
- គ : ឈ្មោះរុក្ខជាតិម្យ៉ាង។

**ខ.២- ចម្លើយ**

១- គេប្រើផ្លាកសញ្ញាសម្រាប់ផ្តល់ព័ត៌មានជំនួសការនិយាយ ការសរសេរ និងកាយវិការបាន។

២- ផ្លាកសញ្ញាមានច្រើនដូចជា ផ្លាកសញ្ញាចរាចរណ៍ ផ្លាកសញ្ញាអាសន្ន ផ្លាកសញ្ញាគ្រោះថ្នាក់ជាដើម។

៣- ផ្លាកសញ្ញាគ្រោះថ្នាក់មានច្រើនប្រភេទដូចជា ផ្លាកសញ្ញាក្បាលខ្មោច ផ្លាកសញ្ញាការដ្ឋានសំណង់ ផ្លាកសញ្ញាគូសខ្វែង ស្លាកសញ្ញាគំនរមែកឈើ។

៤- នៅពេលឃើញសញ្ញាគ្រោះថ្នាក់យើងត្រូវដើរចៀសឱ្យឆ្ងាយ ។

## **ចំណាត់ថ្នាក់ទី២៩**

(ពិន្ទុសរុប: ១០ពិន្ទុ   រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

### **សមិទ្ធិផលថ្មី**

| | | |
|---|---|---|
| វិស្ថានអាកាស | ភ្លើងពណ៌ដេរដាស | តាមដងវិថី |
| ស្ពានឆ្លងទន្លេ | បានសាងសង់ថ្មី | វិមានស៊ឹមស្ដែ |
| | ឈ្មោះសន្តិភាព។ | |
| អគ្គិសនី | ដើរដោយវារី | រាយដល់វាលរាប |
| សួនកសិដ្ឋាន | ប្រឡាយទឹកព្រៀប | តំបន់ទំនាប |
| | ស្រូវស្រែបវរ។ | |

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : វិថី កសិដ្ឋាន។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : សន្តិភាព។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : វារី។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : វាល។

**ខ.២- សំណួរ**

១- តើនៅតាមដងវិថីមានលម្អដោយអ្វី?

២- តើគេសង់អ្វីសម្រាប់ឆ្លងទន្លេ?

៣- តើវិមានធំស៊ឹមស្ដែមានឈ្មោះអ្វី?

៤- តើសមិទ្ធិផលថ្មីៗមានអ្វីខ្លះ?

### **កំណែចំណាត់ថ្នាក់ទី២៩**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- វិថី : ផ្លូវ ថ្នល់។
- កសិដ្ឋាន : ទីកន្លែងចិញ្ចឹមសត្វ។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* សន្តិភាព  ≠ សង្គ្រាម។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* វារី : ទឹក សាគរ គង្គា ជល។

*ខ.១.៤- សទិសសព្ទ ( សទិសសូរ) នឹងពាក្យ ៖*

- វាល: ទីដែលស្រឡះឥតមានព្រៃ ឥតមានអ្វីបាំង។

- រៀលៈ ចិតឆ្អៀលជុំវិញដើម្បីយកសាច់ខាងក្រៅ ឬសាច់ខាងក្នុងដែលមូល។

**ខ.២- ចម្លើយ**

១- នៅតាមដងវិថីមានលម្អដោយភ្លើងពណ៌ដេរដាស។

២- គេសង់ស្ពានសម្រាប់ឆ្លងទន្លេ។

៣- វិមានធំស្កឹមស្កៃមានឈ្មោះថាវិមានសន្តិភាព?

៤- សមិទ្ធិផលថ្មីៗមានអគារខ្ពស់ៗ ស្ពានអាកាស ផ្លូវថ្នល់ជាដើម។

---

## **ចញ្ញាសាទី៣០**

(ពិន្ទុសរុបៈ ១០ពិន្ទុ រយៈពេលៈ ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុៈ ៥ពិន្ទុ រយៈពេលៈ ២០នាទី)

### **ទឹកចិត្តប៉ូលិស**

ល្ងាចមួយសុខុម និងធារី បានចេញពីសាលារៀនដើរទៅផ្ទះដូចសព្វដង។ ពេលនោះមានត្រីចក្រយាន ទោចក្រយាន និងរថយន្តជាច្រើនរត់ស្អេកស្កះតាមដងវិថី។ គ្រានោះកុមារទាំងពីរមកដល់កន្លែងមានភ្លើងសញ្ញាចរាចរណ៍សម្រាប់ថ្មើរជើងឆ្លងកាត់ភ្លើងក៏ដាច់។ ពួកគេមិនហ៊ានឆ្លងផ្លូវទេ ព្រោះឡានម៉ូតូបើកបរលឿនៗរត់ប្រទាក់គ្នាច្រើនពេក។ មន្ត្រីប៉ូលិសចរាចរណ៍បានដឹកដៃពួកគេឆ្លងផ្លូវដោយសុវត្ថិភាព។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុៈ ៥ពិន្ទុ រយៈពេលៈ ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : សុវត្ថិភាព ចរាចរណ៍។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ហ៊ាន បើក។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ឡាន។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ពីរ។

**ខ.២- សំណួរ**

១- តើសុខុមនិងធារីចេញពីសាលារៀននៅពេលណា?

២- តើមានអ្វីកើតឡើងពេលអ្នកទាំងពីរមកដល់កន្លែងថ្មើរជើងឆ្លងកាត់?

៣- តើហេតុអ្វីបានជាពួកគេមិនហ៊ានឆ្លងផ្លូវ?

៤- តើមន្ត្រីប៉ូលិសជាមនុស្សដូចម្តេច?

## **គំរូចញ្ញាសាទី៣០**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- សុវត្ថិភាព : ការប្រកបដោយសេចក្ដីសុខ។
- ចរាចរណ៍ : ការធ្វើដំណើរទៅមកតាមផ្លូវ។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖*

- ហ៊ាន ≠ ខ្លាច
- បើក ≠ បិទ។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* ឡាន : យានយន្ត រថយន្ត យានជំនិះ ព្រះទីនាំង។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- ពីរ : មួយគូបគ្នាគឺមួយនឹងមួយ (២)។
- ពី : អំពី ខាង ឯ។

**ខ.២- ចម្លើយ**

១- សុខុមនិងធារីចេញពីសាលារៀននៅពេលល្ងាច។

២- នៅពេលអ្នកទាំងពីរមកដល់កន្លែងថ្មើរជើងឆ្លងកាត់ភ្លើងសញ្ញាចរាចរណ៍ក៏ដាច់។

៣- បានជាពួកគេមិនហ៊ានឆ្លងផ្លូវព្រោះឡាន ម៉ូតូបើកបរលឿនៗរត់ប្រទាក់គ្នាច្រើនពេក។

៤- មន្ត្រីប៉ូលិសជាមនុស្សគោរពកាតព្វកិច្ចរបស់ខ្លួន មានសុភាវធម៌ចំពោះមនុស្សទូទៅ។

---

## **វិញ្ញាសាទី៣១**

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**បុណ្យសមុទ្រ**

ប្រទេសកម្ពុជាបានចូលជាសមសជិកក្លឹបនៃប្រទេសដែលមានឆ្នេរសមុទ្រស្អាតជាងគេលើសកលលោក។ នៅថ្ងៃទី៣១ខែធ្នូឆ្នាំ២០១១ ការប្រារព្ធបុណ្យនេះផ្តោតទៅលើអត្ថន័យសំខាន់បួនយ៉ាងគឺ ការផ្សព្វផ្សាយតំបន់ទេសចរណ៍ លើកកម្ពស់ឧស្សាហកម្មទេសចរណ៍ អប់រំ និងថែរក្សាឆ្នេរឱ្យមានសម្រស់ស្រស់ស្អាត។ នៅក្នុងពិធីបុណ្យនេះ មានការប្រគំតន្ត្រី ការសម្តែងក្បាច់គុណបុរាណខ្មែរ ការតាំងលក់ផលិតផល ការដុតកាំជ្រួច។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ឧស្សាហកម្ម ផលិតផល។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : លក់ លើ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ថែរក្សា។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : នៅ។

**ខ.២- សំណួរ**

១- តើប្រទេសកម្ពុជាក្លាយជាប្រទេសដែលមានឆ្នេរស្អាតជាងគេនៅថ្ងៃ ខែ ឆ្នាំណា?

២- តើការប្រារព្ធបុណ្យសមុទ្រផ្តោតលើអត្ថន័យសំខាន់ប៉ុន្មានយ៉ាង?

---

៣- តើក្នុងវិធីបុណ្យសមុទ្រប្រព្រឹត្តទៅយ៉ាងដូចម្ដេច?

៤- តើហេតុអ្វីបានជាគេប្រារព្ធពិធីបុណ្យសមុទ្រ?

## **កំណែវចញ្ញាសាទី៣១**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ឧស្សាហកម្ម : ការបង្កើតរបស់ប្រើប្រាស់តាមសម័យនិយម។
- ផលិតផល : ផលដែលកើតបានមកពីការប្រកបមុខរបរផ្សេងៗមានកសិកម្ម និងឧស្សាហកម្ម ជាដើម។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖*

- លក់ ≠ ទិញ
- លើ ≠ ក្រោម។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖*

- ថែរក្សា : ថែទាំ បីបាច់ ចិញ្ចឹម កាន់កាប់ ការពារ ប្រយ័ត្ន។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- នៅ : ឋិត ស្ថិត មាន។
- នៅ : ដែលមានទៀត ដែលមិនទាន់អស់។
- នូវ : ពាក្យប្រាប់ដំណើរសម្រេចអំពើដែលគេត្រូវធ្វើ ។

**ខ.២- ចម្លើយ**

១- ប្រទេសកម្ពុជាក្លាយជាប្រទេសដែលមានឆ្នេរស្អាតជាងគេនៅថ្ងៃទី៣១ ខែធ្នូ ឆ្នាំ២០១១។

២- ការប្រារព្ធបុណ្យសមុទ្រផ្ដោតលើអត្ថន័យសំខាន់បួនយ៉ាង។

៣- ក្នុងវិធីបុណ្យសមុទ្រប្រព្រឹត្តទៅដោយមានការប្រគំតន្ត្រី ការសម្ដែងក្បាច់គុណបុរាណខ្មែរការតាំងលក់ផលិតផល ការដុតកាំជ្រួច។

៤- បានជាគេប្រារព្ធពិធីបុណ្យសមុទ្រព្រោះជាការដឹងគុណសមុទ្រ និងទាក់ទាញភ្ញៀវទេសចរណ៍។

---

## **វិញ្ញាសាទី៣២**

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

### **ភាពស្មោះត្រង់**

សត្វសិង្ហនិងឆ្កែតឿរស់នៅជាមួយគ្នាយ៉ាងសុខស្រួលអស់រយៈពេលមួយឆ្នាំ។ ក្រោយមកឆ្កែតឿមានជំងឺក៏ងាប់ទៅ។ ពេលនោះសិង្ហស្រែករោទិ៍ ហក់លោតក្នុងទ្រុងចុះឡើងរហូតអស់កម្លាំង ហើយមិនព្រមឱ្យឆ្មាំយកខ្មោចឆ្កែចេញពីទ្រុងសោះ។ សិង្ហកើតទុកមិនស៊ីចំណីរហូតដល់ថ្ងៃទីប្រាំមួយ វាក៏ងាប់បាត់ទៅ។

---

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : សិង្ហ ទ្រុង។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ងាប់ ទៅ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ទុក្ខ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : រស់។

**ខ.២- សំណួរ**

១- តើសត្វអ្វីខ្លះដែលរស់នៅក្នុងទ្រុង?

២- តើសត្វអ្វីដែលមានជំងឺងាប់?

៣- តើសត្វអ្វីកើតទុក្ខមិនស៊ីចំណី?

៤- តើទង្វើបែបណាដែលប្អូនយល់ថាជាភាពស្មោះត្រង់?

**កំណែចញ្ញាសាទី៣២**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- សិង្ហ : សត្វតោ។
- ទ្រុង : ប្រដាប់សម្រាប់ដាក់ឃាំងសត្វទាំងឡាយ។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖*

- ងាប់ ≠ រស់
- ទៅ ≠ មក។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* ទុក្ខ : ព្រួយ លំបាក វេទនា។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- រស់: មានជីវិតនៅមិនទាន់ស្លាប់។
- រួស: រហ័ស ឆាប់។
- រស: ការប៉ះពាល់នឹងអណ្តាតដឹងប្រៃ ផ្អែម ជូរជាដើម។

**ខ.២- ចម្លើយ**

១- សត្វដែលរស់នៅក្នុងទ្រុងគឺសត្វសិង្ហនិងឆ្កែតឿ។

២- សត្វដែលមានជំងឺងាប់គឺឆ្កែតឿ។

៣- សត្វដែលកើតទុក្ខមិនស៊ីចំណីគឺសត្វសិង្ហ។

៤- ទង្វើដែលជាភាពស្មោះត្រង់គឺ ទង្វើល្អ មានសច្ចៈធម៌ យុត្តិធម៌។

## **ចំណាត់ថ្នាក់សាទី៣៣**

(ពិន្ទុសរុប: ១០ពិន្ទុ   រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

### **កន្លែងទេសចរណ៍**

ជ្រោះសែនមនោរម្យ     ប៊ូស្រាអូរជុំ     យក្សឡោមផូរផង់
សមុទ្រឈើខ្ពស់     កោះកេរត្រចង់     ព្រះវិហារសង់
តាំងពីដូនតា។
រីឯ្នេរសមុទ្រ     លាតសន្ធឹងផុត     ពីខ្សែនេត្រា
ជាសម្បត្តិខ្មែរ     ប្រជាខេមរា     យើងត្រូវរក្សា
ឱ្យបានគង់វង្ស។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : សម្បត្តិ មនោរម្យ។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : គង់វង្ស ខ្ពស់។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : នេត្រា។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ជ្រោះ។

**ខ.២- សំណួរ**

១- តើកន្លែងទេសចរណ៍មានឈ្មោះអ្វីខ្លះ?

២- តើប្រាសាទអ្វីខ្លះបានបន្សល់ទុកពីដូនតា?

៣- តើអ្វីលាតសន្ធឹងផុតពីនេត្រា?

៤- តើប្អូនៗត្រូវធ្វើដូចម្តេចដើម្បីរក្សាកន្លែងទេសចរណ៍ឱ្យបានស្អាត?

### **កំណែចំណាត់ថ្នាក់សាទី៣៣**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- សម្បត្តិ :  វត្ថុ ធនធាន ទ្រព្យផ្សេងៗ ទ្រព្យសម្រាប់ប្រើប្រាស់។
- មនោរម្យ : ដែលជាទីរីករាយចិត្ត ដែលគួរឱ្យសប្បាយក្នុងចិត្ត។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖*

- គង់វង្ស  ≠ បាត់បង់
- ខ្ពស់ ≠ ទាប។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* នេត្រា: ភ្នែក ព្រះនេត្រ ចក្ខុ។

*ខ.១.៤- សទិសសព្ទ នឹងពាក្យ៖*

- ជ្រោះ : ជ្រលងជ្រៅក្នុងភ្នំ ចង្ហូរទឹកចេញពីភ្នំ។
- ជ្រួស : ជ្រលោះ ជ្រុលហួស ឃ្វាងដំណើរគ្នា។

**ខ.២- ចម្លើយ**

១- កន្លែងទេសចរណ៍មានឈ្មោះជ្រោះសែនមនោរម្យ ប៊ូស្រា អូរជុំ យក្សឡោមសមុទ្រឈើ កោះកេរ ព្រះវិហារ។

២- ប្រាសាទដែលបានបន្សល់ទុកពីដូនតាគឺប្រាសាទ កោះកេរនិងប្រាសាទព្រះវិហារ។

៣- ឆ្នេរសមុទ្រលាតសន្ធឹងផុតពីនេត្រា។

៤- ដើម្បីរក្សាកន្លែងទេសចរណ៍ឱ្យបានស្អាតយើងមិនត្រូវបោះសម្រាមចោលផ្ដេសផ្ដាសនាំឱ្យខូច បរិស្ថាន។

---

**ចំណោះសាទី៣៤**

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ធនធានធម្មជាតិ**

តំបន់ព្រៃភ្នំ រ៉ែឈើតូចធំ ជម្រកសត្វទៀត
ម្រឹគីម្រឹគា បក្សាព្រោងព្រាត រស់តាមក្រុមញាតិ
អឹងកងពេញព្រៃ។

តំបន់ខ្ពង់រាប ស្ទឹងបឹងទំនាប ដំណាំច្រើនក្រៃ
ស្រែស្រូវចម្ការ ផល្លាប្រពៃ ដោយសារអ្នកថ្លៃ
ជាតិបានថ្កើងថ្កាន។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ចម្ការ ម្រឹគីម្រឹគា។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ថ្លៃ រស់។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ថ្កើងថ្កាន។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ជាតិ។

**ខ.២- សំណួរ**

១- តើរ៉ែនិងព្រៃឈើមាននៅទីណា?

២- តើអ្វីជាជម្រកសត្វព្រៃគ្រប់ប្រភេទ?

៣- តើគេច្រើនធ្វើស្រែចម្ការនៅតំបន់ណា?

---

៤- តើអ្វីខ្លះជាធនធានធម្មជាតិ?

## កំណែវិញ្ញាសាទី៣៤

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ចម្ការ : ទីដីដែលគេឆ្ការសម្រាប់ដាំដំណាំផ្សេងៗ។
- ម្រឹគីម្រឹគា : ពួកសត្វម្រឹគញី ម្រឹគឈ្មោល។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖*

- ថ្លៃ ≠ ថោក
- រស់ ≠ ស្លាប់។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖*

- ថ្កើងថ្កាន: ខ្ពង់ខ្ពស់ ចិញ្ចែង ថ្កាន រុងរឿង ប្រសើរ ឧត្តម ថ្លៃថ្លា។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- ជាតិ : កំណើតមនុស្សដែលមានសញ្ជាតិផ្សេងគ្នា។
- ជាត : ដែលកើតហើយ ដែលមាន ដែលប្រាកដហើយ។

**ខ.២- ចម្លើយ**

១- រ៉ែនិងព្រៃឈើមាននៅតំបន់ព្រៃភ្នំ។

២- ព្រៃឈើជាជម្រកសត្វព្រៃគ្រប់ប្រភេទ។

៣- គេច្រើនធ្វើស្រែចម្ការនៅតំបន់ខ្ពង់រាប។

៤- ធនធានធម្មជាតិមានដូចជារ៉ែ ព្រៃឈើ មច្ឆជាតិជាដើម។

---

## វិញ្ញាសាទី៣៥

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

### សុវត្ថិភាពភូមិខ្ញុំ

ភូមិខ្ញុំស្ថិតនៅទីប្រជុំជនមួយ មានប្រជាជនរស់នៅកុះករ។ ទីនោះពួកគេរស់នៅបានសុខសាន្តដោយសារមានអ្នកដឹកនាំសហគមន៍ល្អ។ អាជ្ញាធរដែនដី និងប្រជាជនចេះជួយគ្នា រួមសាមគ្គីគ្នា។ អំពើចោរកម្មឆក់ប្លន់ ល្បែងស៊ីសងគ្រប់ប្រភេទ ការប្រើអាវុធខុសច្បាប់ ការផលិតចែកចាយ ប្រើប្រាស់គ្រឿងញៀន ក្មេងទំនើង ការជួញដូរស្ត្រី និងកុមារ និងអំពើហិង្សាក្នុងគ្រួសារត្រូវបំបាត់។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

---

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : ភូមិ សាមគ្គី។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : ហិង្សា ខុស។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : សុខ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ជន។

**ខ.២- សំណួរ**

១- តើភូមិនោះស្ថិតនៅឯណា?

២- តើហេតុអ្វីបានជាប្រជាជនរស់នៅសុខសាន្ត?

៣- តើអំពើអ្វីខ្លះដែលប្អូនគិតថាល្មើសនឹងច្បាប់?

៤- តើប្អូនៗត្រូវធ្វើដូចម្ដេចខ្លះដើម្បីរស់នៅក្នុងសហគមន៍បានសុខ?

## កំណែបញ្ញាសាទី៣៥

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- ភូមិ : សំដៅទីដែលមានប្រជុំផ្ទះលំនៅក្នុងតំបន់មួយ។
- សាមគ្គី : សេចក្ដីព្រមព្រៀង ដំណើរស្រុះគ្នា។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖*

- ហិង្សា ≠ អហិង្សា
- ខុស ≠ ត្រូវ។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* សុខ : សប្បាយ ងាយ ស្រួល ស្រណុក សម្រាន្ត។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- ជន : សព្វសត្វដែលកើតក្នុងលោក មនុស្ស អ្នកផង។
- ជន់ : ឡើងសាយភាយ(ទឹកជន់)។
- ជន្ម : ជីវិត។

**ខ.២- ចម្លើយ**

១- ភូមិនោះស្ថិតនៅឯទីប្រជុំជនមួយដែលមានប្រជាជនរស់នៅកុះករ។

២- បានជាប្រជាជនរស់នៅសុខសាន្ត ព្រោះដោយសារមានអ្នកដឹកនាំសហគមន៍ល្អ។

៣- អំពើដែលខ្ញុំគិតថាល្មើសនឹងច្បាប់គឺអំពើចោរកម្ម ឆក់ប្លន់ ល្បែងស៊ីសងគ្រប់ប្រភេទ ការប្រើអាវុធខុសច្បាប់ ការផលិតចែកចាយ ប្រើប្រាស់គ្រឿងញៀន ក្មេងទំនើង ការជួញដូរស្ត្រី និងកុមារ និងអំពើហិង្សាក្នុងគ្រួសារ។

៤- ដើម្បីរស់នៅក្នុងសហគមន៍បានសុខយើងត្រូវចេះរួបរួមសាមគ្គីគ្នា ជួយគ្នាទៅវិញទៅមកមិនប្រកាន់ជាតិសាសន៍ ពណ៌សម្បុរ។

**ខណ្ឌាសាទី៣៦**

(ពិន្ទុសរុប: ១០ពិន្ទុ  រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ឧបករណ៍តន្ត្រីខ្មែរ**

តូរ្យតន្ត្រីខ្មែរជាសិល្បៈបុរាណ ដែលកើតមានឡើងអស់កាលដ៏យូរលង់មកហើយ។ បុព្វបុរសខ្មែរបានបង្កើតឧបករណ៍ភ្លេងនិងនិពន្ធបទភ្លេងជាច្រើន។ គ្រឿងភ្លេងបុរាណខ្មែររួមមាន ទ្រ ស្គរ តាខេ ឃឹម រនាត គង ស្រឡៃ ចាប៉ី សាដៀវ ឈិង ឆាប ក្រាប។ល។ ឧបករណ៍តន្ត្រីខ្មែរនេះបានប្រគំឡើងតាមរយៈការដេញ ដំ ផ្លុំ កូត។  គេច្រើនយកឧបករណ៍នេះទៅប្រើប្រាស់ក្នុងពិធីបុណ្យផ្សេងៗ។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ  រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : បុព្វបុរស រនាត។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : បុរាណ។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : និពន្ធ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ទ្រ។

**ខ.២- សំណួរ**

១- តើនរណាជាអ្នកបង្កើតឧបករណ៍ភ្លេងខ្មែរ?

២- តើគ្រឿងភ្លេងបុរាណខ្មែរមានអ្វីខ្លះ?

៣- តើគេយកឧបករណ៍ភ្លេងខ្មែរប្រគំឡើងតាមរបៀបណា?

៤- តើគ្រឿងភ្លេងបុរាណខ្មែរគេយកទៅលេងក្នុងកម្មវិធីអ្វីខ្លះ?

**កំណែខណ្ឌាសាទី៣៦**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- បុព្វបុរស : ដូនតាជំនាន់ដើម ឬជំនាន់មុន។
- រនាត : គ្រឿងភ្លេងវាយ ដំ មានស្នូកវែង មានផ្លែធ្វើដោយបន្ទះឫស្សី។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* បុរាណ   ≠ ទំនើប។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ )នឹងពាក្យ ៖* និពន្ធ: តែង តាក់តែង ចងក្រង រៀបរៀង។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- ទ្រ : កាន់ ទប់ ឬដាក់កល់ពីក្រោម។
- ទ្រ : ឈ្មោះគ្រឿងភ្លេងខ្មែរពួកមួយ ប្រើខាងកូតឱ្យឮសូរសព្ទ។

**ខ.២- ចម្លើយ**

១- អ្នកដែលបង្កើតឧបករណ៍ភ្លេងខ្មែរគឺបុព្វបុរសខ្មែរ។

២- គ្រឿងភ្លេងបុរាណខ្មែរមាន ទ្រ ស្គរ តាខេ ឃឹម រនាត គង ស្រឡៃ ចាប៉ី សាដៀវ ឈិង ឆាប និង ក្រាប។

៣- គេយកឧបករណ៍ភ្លេងខ្មែរប្រគំឡើងតាមរយៈការដេញ ដំ ផ្លុំ កូត។

៤- គ្រឿងភ្លេងបុរាណខ្មែរគេយកទៅលេងក្នុងកម្មវិធីផ្សេងៗដូចជា បុណ្យសាសនា រៀបអាពាហ៍ពិពាហ៍ បុណ្យសព បុណ្យជាន់អារក្ស បុណ្យដារភូមិ បុណ្យបច្ច័យបួនជាដើម។

---

**វិញ្ញាសាទី៣៧**

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានត្រួតពិនិត្យកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**បច្ចេកវិទ្យាព័ត៌មាន**

បច្ចេកវិទ្យាគមនាគមន៍ និងព័ត៌មានវិទ្យាតាមប្រព័ន្ធកុំព្យូទ័រ ឬទូរស័ព្ទដៃ ជាមធ្យោបាយមួយសម្រាប់ទាក់ទងគ្នា។ វាបានផ្តល់ និងចែករំលែកនូវចំណេះដឹង បទពិសោធ ជំនាញបច្ចេកទេស និងបំណិនផ្សេងៗ។ ការរីកចម្រើននេះមានសារៈប្រយោជន៍ដល់មនុស្សគ្រប់រូបលើពិភពលោកក្នុងការផ្តល់និងទទួលបានព័ត៌មានថ្មីៗដើម្បីរួមចំណែកអភិវឌ្ឍសមត្ថភាព។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : គមនាគមន៍ ប្រយោជន៍។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : រីកចម្រើន។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ជំនាញ។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : ព័ន្ធ។

**ខ.២- សំណួរ**

១- តើគេប្រើប្រព័ន្ធកុំព្យូទ័រ ឬទូរស័ព្ទដើម្បីអ្វី?

២- តើបច្ចេកវិទ្យាព័ត៌មានបានផ្តល់ និងចែករំលែកនូវអ្វីខ្លះ?

៣- តើការប្រើប្រាស់ព័ត៌មានវិទ្យាមានភាពងាយស្រួលដូចម្តេច?

៤- តើការរីកចម្រើនផ្នែកបច្ចេកវិទ្យាព័ត៌មានមានសារប្រយោជន៍ដូចម្តេច?

**កំណែវិញ្ញាសាទី៣៧**

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- គមនាគមន៍ : ផ្លូវទាក់ទងសម្រាប់ធ្វើដំណើរទៅមក។

- ប្រយោជន៍ : ផលដែលសម្រេចបានអំពីការប្រកប។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ)* ៖ រីកចម្រើន ≠ អន់ថយ។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ* ៖ ជំនាញ: វាងវៃ ប៉ិន ប្រសប់ ស្ទាត់ បំណិន។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ* ៖

- ព័ន្ធ : ចង ជាប់ ជំពាក់ ទាក់ ឆ្វាក់ប្រទាក់ជាប់គ្នា។
- ពាន់ : ចំនួនមួយរយដប់ដង។

**ខ.២- ចម្លើយ**

១- គេប្រើប្រព័ន្ធកុំព្យូទ័រ ឬទូរស័ព្ទដើម្បីធ្វើការទំនាក់ទំនងគ្នា។

២- បច្ចេកវិទ្យាព័ត៌មានបានផ្តល់ និងចែករំលែកនូវចំណេះដឹង បទពិសោធ ជំនាញបច្ចេកទេស និងបំណិនផ្សេងៗ។

៣- ការប្រើប្រាស់ព័ត៌មានវិទ្យាមានមានភាពងាយស្រួលណាស់ វារហ័សទាន់ចិត្ត។

៤- ការរីកចម្រើនផ្នែកបច្ចេកវិទ្យាព័ត៌មានមាន សារប្រយោជន៍ចំពោះមនុស្សគ្រប់រូបលើពិភពលោកក្នុងការផ្តល់និងទទួលព័ត៌មានថ្មីៗដើម្បីរួមចំណែកអភិវឌ្ឍសមត្ថភាព។

---

**វិញ្ញាសាទី៣៨**

(ពិន្ទុសរុប: ១០ពិន្ទុ រយៈពេល: ៤០នាទី)

ចូរសរសេរតាមអានរៀបចំកថាខណ្ឌខាងក្រោម។

**ក- អត្ថបទសរសេរតាមអាន** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**សមាគមអាស៊ាន**

ប្រទេសសមាជិកអាស៊ានមានចំនួនដប់មួយគឺ ប្រទេសឥណ្ឌូណេស៊ី ម៉ាឡេស៊ី មីយ៉ាន់ម៉ា ហ្វីលីពីន សិង្ហបុរី ថៃ ប្រ៊ុយណេ វៀតណាម ឡាវ កម្ពុជា និងភូមា។ សមាគមអាស៊ានបង្កើតឡើងដើម្បីលើកកម្ពស់វិស័យវប្បធម៌ សេដ្ឋកិច្ច វឌ្ឍនភាពនយោបាយ និងពង្រឹងទំនាក់ទំនងនៅតំបន់អាស៊ីអគ្នេយ៍។ នៅឆ្នាំ២០១២ ព្រះរាជាណាចក្រកម្ពុជាជាប្រធានអាស៊ាន។ តួនាទីនេះជាមោទនភាពជាតិមួយដ៏ឧដុង្គឧត្តមរបស់ជាតិខ្មែរយើង។

**ខ- សំណួរលើអត្ថបទ** (ពិន្ទុ: ៥ពិន្ទុ រយៈពេល: ២០នាទី)

**ខ.១- វាក្យសព្ទ**

១- ចូរពន្យល់ពាក្យ : សមាជិក ឧដុង្គឧត្តម។

២- ចូររកបដិសព្ទ (ពាក្យផ្ទុយ) នឹងពាក្យ : លើក។

៣- ចូររកវេវចនសព្ទ (សទិសន័យ) នឹងពាក្យ : ប្រទេស។

៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ : និង។

**ខ.២- សំណួរ**

១- តើប្រទេសសមាជិកអាស៊ានមានចំនួនប៉ុន្មាន?

២- តើប្រទេសណាខ្លះជាសមាជិកអាស៊ាន?

៣- តើព្រះរាជាណាចក្រកម្ពុជាធ្វើជាប្រធានអាស៊ាននៅឆ្នាំណា?

៤- តើសមាគមអាស៊ានបង្កើតឡើងដើម្បីអ្វីខ្លះ?

## កំណែលំហាត់ទី៣៨

**ខ.១- វាក្យសព្ទ**

*ខ.១.១- ពន្យល់ពាក្យ ៖*

- សមាជិក : អ្នកចូលរួមក្នុងអង្គការនយោបាយក្នុងសមាគម ក្នុងគ្រួសារ។
- ឧដុង្គឧត្តម : ដែលឧត្តមលើសលែង ប្រសើរកន្លង។

*ខ.១.២- បដិសព្ទ (ពាក្យផ្ទុយ) ៖* លើក ≠ ដាក់។

*ខ.១.៣- វេវចនសព្ទ (សទិសន័យ) នឹងពាក្យ ៖* ប្រទេស: រដ្ឋ បុរី នគរ។

*ខ.១.៤- សទិសសព្ទ (សទិសសូរ) នឹងពាក្យ ៖*

- និង: ពាក្យសម្រាប់និយាយតពាក្យ ឬតឃ្លាពីមួយទៅមួយ។
- នឹង: ពាក្យប្រាប់ដំណើរសម្រេចនូវអំពើរ សម្រាប់និយាយនាំមុខនាមសព្ទ។
- នឹង: ស្ងៀមមិនកម្រើក មិនប្រែប្រួល។
- ហ្នឹង: ពាក្យសម្រាប់ឆ្លើយដោយមានសំឡេងខ្ពស់ស្រួយខ្លាំង។

**ខ.២- ចម្លើយ**

១- ប្រទេសសមាជិកអាស៊ានមានចំនួន១១។

២- ប្រទេសដែលជាសមាជិកអាស៊ានគឺ ប្រទេសឥណ្ឌូណេស៊ី ម៉ាឡេស៊ី មីយ៉ាន់ម៉ា ហ្វីលីពីន សិង្ហបុរី ថៃ ប្រ៊ុយណេ វៀតណាម ឡាវ កម្ពុជា និងភូមា។

៣- ព្រះរាជាណាចក្រកម្ពុជាធ្វើជាប្រធានអាស៊ាននៅឆ្នាំ២០១២។

៤- សមាគមអាស៊ានបង្កើតឡើងដើម្បីលើកកម្ពស់វិស័យវប្បធម៌ សេដ្ឋកិច្ច វឌ្ឍនភាពនយោបាយ និងពង្រឹងទំនាក់ទំនងនៅតំបន់អាស៊ីអគ្នេយ៍។